

ព្រះរាជាណាចក្រកម្ពុជា

ជាតិ សាសនា ព្រះមហាក្សត្រ




# ថវិកាសង្ខេប ឆ្នាំ ២០១៦

## BUDGET IN BRIEF Fiscal Year 2016

នាយកដ្ឋានថវិកានីយកម្ម នៃអគ្គនាយកដ្ឋានថវិកា

# មាតិកា



ទំព័រ

# ជំពូក ១ បរិការណ៍រួមនៃការរៀបចំថវិកាឆ្នាំ ២០១៦

ថវិកាឆ្នាំ ២០១៦ ត្រូវបានរៀបចំឡើងប្រកបដោយមហិច្ឆតានៅក្នុងទិសដៅដ៏ជាក់លាក់ គឺគាំទ្រដល់ការបន្តអនុវត្តការកែទម្រង់ស៊ីជម្រៅ និងគ្រប់ជ្រុងជ្រោយសំដៅធានាឱ្យបាននូវការផ្តល់សេវាសាធារណៈកាន់តែមានគុណភាព និងមានប្រសិទ្ធភាព ដើម្បីឆ្លើយតបនឹងបំណងប្រាថ្នារបស់ប្រជាជន និងដើម្បីសម្រេចឱ្យបាននូវគោលដៅជាយុទ្ធសាស្ត្រ ដែលបានដាក់ចេញនៅក្នុង **យុទ្ធសាស្ត្រចតុកោណ ដំណាក់កាល ទី៣ ដើម្បីកំណើន ការងារ សមធម៌ និងប្រសិទ្ធភាព** ដែលជា "**របៀបវារៈគោលនយោបាយសង្គម-សេដ្ឋកិច្ច**" នៃ "**កម្មវិធីនយោបាយរបស់រាជរដ្ឋាភិបាលនីតិកាលទី៥ នៃរដ្ឋសភា**"



## ១.១ បញ្ហាប្រឈម និង ហានិភ័យ

និយាយជារួម កម្ពុជានៅតែអាចបន្តសម្រេចបាននូវកំណើនសេដ្ឋកិច្ចក្នុងរង្វង់ ៧% ក្នុងមួយឆ្នាំ នៅក្នុងរយៈពេលខ្លី និងមធ្យមខាងមុខ។ ទស្សនវិស័យសុទិដ្ឋិនិយមនេះ ឈរលើស្ថានភាពល្អប្រសើរនៃសេដ្ឋកិច្ចសកលលោក ពិសេសកំណើនសេដ្ឋកិច្ចរបស់អាមេរិក និងការបន្តធ្លាក់ចុះនៃតម្លៃប្រេងឆៅលើទីផ្សារពិភពលោក។ ក៏ប៉ុន្តែថវិកាឆ្នាំ ២០១៦ នេះ ក៏ស្ថិតក្នុងបរិការណ៍ដែលកម្ពុជាត្រូវឥប្រឈមនឹងហានិភ័យពី**កត្តាខាងក្រៅ** និង**កត្តាខាងក្នុង**មួយចំនួន ដែលអាចនឹងធ្វើឱ្យប៉ះពាល់ដល់កំណើនសេដ្ឋកិច្ចរបស់កម្ពុជា។



## ១.២ គោលការណ៍នៃការរៀបចំថវិកាឆ្នាំ ២០១៦

ថវិកាឆ្នាំ ២០១៦ ត្រូវបានរៀបចំឡើងដោយឈរលើគោលការណ៍សំខាន់ៗ ដូចខាងក្រោម ÷



# ជំពូក ២ ក្របខណ្ឌម៉ាក្រូសេដ្ឋកិច្ចឆ្នាំ ២០១៦

## ២.១. សូចនាករសេដ្ឋកិច្ច

| សូចនាករសេដ្ឋកិច្ច | ២០១៤ | ២០១៥ | ២០១៦ |
|---|---|---|---|
| | អនុវត្ត | ប៉ាន់ស្មាន | ព្យាករណ៍ |
| ផសស តាមថ្លៃបច្ចុប្បន្ន (ប៊ីលានរៀល) | ៦៧ ៧៤០ | ៧៤ ៩៣២ | ៨១ ៩៣៤ |
| កំណើនពិតនៃ ផសស (%) | ៧,១% | ៦,៩% | ៧,០% |
| ផសស សម្រាប់មនុស្សម្នាក់ (ដុល្លារអាមេរិក) | ១ ១៣៨ | ១ ២២៨ | ១ ៣២៥ |
| អតិផរណា (ជាមធ្យមប្រចាំឆ្នាំ) | ៣,៩% | ៣,០% | ៣,៥% |
| អត្រាប្តូរប្រាក់ (ដុល្លារអាមេរិក/ រៀល) | ៤ ០៣៩ | ៤ ០៥០ | ៤ ០៥០ |
| សមតុល្យគណនីចរន្ត (% នៃ ផសស) | -៩,៧% | -៨,៧% | -៩,៧% |
| ទុនបម្រុងអន្តរជាតិ (លានដុល្លារអាមេរិក) | ៤ ៣៨២ | ៤ ៩២៦ | ៥ ៧៣៩ |
| ទុនបម្រុងអន្តរជាតិ (ចំនួនខែនៃការនាំចូល) | ៤,៣ | ៤,៥ | ៤,៥ |

តាមការប៉ាន់ស្មានបឋម កំណើនសេដ្ឋកិច្ចកម្ពុជានៅក្នុងឆ្នាំ ២០១៥ អាចសម្រេចបានប្រមាណ ៦,៩% ប៉ុណ្ណោះ ដោយសារការប្រឈមនឹងហានិភ័យមួយចំនួនដូចបានជម្រាបជូនខាងលើ ប៉ុន្តែសម្រាប់ឆ្នាំ ២០១៦ សេដ្ឋកិច្ចកម្ពុជាត្រូវបានព្យាករថានឹង**<u>សម្រេចបាននូវកំណើនក្នុងរង្វង់ ៧%</u>** ដែលធ្វើឱ្យ ផសស តាមថ្លៃបច្ចុប្បន្នមានចំនួន ៨១ ៩៣៤ ៣៣៣ លានរៀល ឬ ប្រមាណជា ២០ ២៣១ លានដុល្លារអាមេរិក នៅឆ្នាំ ២០១៦ ហើយ ផសស សម្រាប់មនុស្សម្នាក់នឹងឡើងដល់ **<u>១ ៣២៥ ដុល្លារអាមេរិក</u>** រីឯទុនបម្រុងអន្តរជាតិព្យាករថានឹងឡើងដល់ **<u>៥ ៧៣៩ លានដុល្លារអាមេរិក</u>** ។

## ២.២ កំណើន ផ.ស.ស និង កំណើនតាមវិស័យ



## ២.៣ អត្រាប្តូរប្រាក់




**អត្រាប្តូរប្រាក់មានស្ថិរភាព ខណៈដែលអតិផរណាស្ថិតក្នុងកម្រិតទាប**

- អតិផរណាមធ្យមប្រចាំឆ្នាំ ២០១៥ នឹងត្រូវបានគ្រប់គ្រងឱ្យស្ថិតនៅក្នុងរង្វង់ ៣,០% ដោយរំពឹងថាថ្លៃប្រេង និងថ្លៃទំនិញវត្ថុធាតុដើមនៅលើទីផ្សារអន្តរជាតិបន្តធ្លាក់ចុះ ប៉ុន្តែសម្រាប់ឆ្នាំ ២០១៦ អាចឡើងដល់ ៣,៥% ដោយសារហានិភ័យដូចបានជម្រាបជូនខាងលើ។
- អត្រាប្តូរប្រាក់រៀល គឺស្ថិតនៅក្នុងរង្វង់ ៤ ០៥០ រៀល ក្នុងមួយដុល្លារអាមេរិក សម្រាប់ឆ្នាំ ២០១៥ និង ២០១៦។

# ជំពូក ៣ ក្របខណ្ឌថវិកាឆ្នាំ ២០១៦

ឈរលើគោលការណ៍ខាងលើ ក៏ដូចជា ក្នុងក្របខណ្ឌនៃកំណើនសេដ្ឋកិច្ច ដែលត្រូវបានគ្រោងក្នុងរង្វង់ ៧% ព្រមជាមួយនឹងសេណារីយ៉ូចំណូលដែលមានលក្ខណៈសុទិដ្ឋិនិយម និងដោយឈរលើមូលដ្ឋាននៃលទ្ធផលល្អប្រសើរនៃការអនុវត្តចំណូល ពិសេសចំណូលគយ និងចំណូលពន្ធដារឆ្នាំ ២០១៤ និង ឆ្នាំ ២០១៥ ក្របខណ្ឌថវិកាឆ្នាំ ២០១៦ ត្រូវបានរៀបចំឡើង ដោយធ្វើការកំណត់ដូចតទៅ÷

| សូចនាករថវិកា | ២០១៤ | | ២០១៥ | ២០១៦ |
|---|---|---|---|---|
| | ច្បាប់ | អនុវត្ត | ច្បាប់ | គ្រោង |
| ចំណូលក្នុងប្រទេស (%ផ.ស.ស) | ១៥,៥៣ | ១៧,០៥ | ១៥,៧៦ | ១៧,៥៣ |
| *ចំណូលចរន្ត (%ផ.ស.ស)* | ១៥,១៨ | ១៦,៧៨ | ១៥,៥៩ | ១៧,៣៧ |
| ចំណាយថវិការដ្ឋសរុប (%ផ.ស.ស) | ២០,៩១ | ២១,៥៥ | ២០,៩៥ | ២២,៣២ |
| *ចំណាយចរន្ត (%ផ.ស.ស)* | ១២,៨៧ | ១២,៧២ | ១៣,០៩ | ១៤,៤៣ |
| អតិរេកចរន្ត (%ផ.ស.ស) | ២,៣១ | ៤,០៦ | ២,៥០ | ២,៩៣ |
| ឱនភាពសរុប (%ផ.ស.ស) | -៥,៣៩ | -៤,៥០ | -៥,១៩ | -៤,៧៩ |

www.yerngshare.blogspot.com




ការបែងចែកតាមវិស័យ

- **<u>ចំណូលថវិកាក្នុងប្រទេស</u>** ត្រូវបានគ្រោង ១៧,៥៣% នៃ ផសស ស្មើនឹងចំនួន <u>១៤ ៣៥៩ ៣៦៩ លានរៀល</u> ។
- **<u>ចំណាយសរុបថវិការដ្ឋ</u>** ត្រូវបានគ្រោង ២២,៣២% នៃ ផសស ស្មើនឹងចំនួន <u>១៨ ២៨៣ ៧១៩ លានរៀល</u> ។
- **<u>អតិរេកថវិកាចរន្ត</u>** កើនឡើងមានន័យថា ចំណូលចរន្តកើនឡើងលឿនជាងចំណាយចរន្ត ដែលធ្វើឱ្យរាជរដ្ឋាភិបាលកម្ពុជាអាចសន្សំថវិកាបានកាន់តែច្រើនឡើងសម្រាប់ចំណាយវិនិយោគ និងត្រៀមបម្រុង។
- **<u>ឱនភាពថវិកាសរុប</u>** ធ្លាក់ចុះគឺជាការបង្ហាញឱ្យឃើញ ពីការថយចុះជាបណ្ដើរៗ នូវការពឹងផ្អែកលើហិរញ្ញប្បទានពីក្រៅប្រទេស។

## ៣.១ ស្ថានភាពចំណូលថវិការដ្ឋ

ក្នុងក្របខណ្ឌនៃគោលដៅខាងលើ និង ក្នុងគោលបំណងធានាឱ្យមានលំហថវិកាឆ្នាំ ២០១៦ ជាពិសេសដើម្បីបង្កើនសាច់ប្រាក់ត្រៀមបម្រុង រាជរដ្ឋាភិបាលត្រូវបង្កើន **<u>ចំណូលចរន្តថ្នាក់ជាតិ</u>** ឱ្យស្មើនឹង ១៣ ៤០៧ ២៦៣ លានរៀល ដែលក្នុងនោះ ÷

- ចំណូលសារពើពន្ធ ១១ ៥៥៥ ០៥៥ លានរៀល
- ចំណូលមិនមែនសារពើពន្ធ ១ ៨៥២ ២០៨ លានរៀល




ពន្ធផ្ទាល់នៅមានសក្តានុពលសម្រាប់ពង្រីក




ពន្ធផ្ទាល់

ពន្ធប្រយោល

ពន្ធក្នុងប្រទេសជាប្រភពចំណូល
សារពើពន្ធដ៏សំខាន់




ពន្ធលើពាណិជ្ជកម្មក្រៅប្រទេស

ពន្ធក្នុងប្រទេស

**<u>ចំណូលមូលធន</u>** ត្រូវសម្រេចឱ្យបានចំនួន ៤ ២០៥ ២១៤ លានរៀលក្នុងនោះ

- ចំណូលមូលធនក្នុងប្រទេស ១៣០ ៨៦៤ លានរៀល
- ចំណូលមូលធនក្រៅប្រទេស ៤ ០៧៤ ៣៥០ លានរៀល





0.66%

**ហិរញ្ញប្បទានឥតសំណង** មាននិន្នាការធ្លាក់ចុះមកត្រឹម **0,៦៦ %** នៃ ផសស

ការធ្វើដំណើរចាកចេញពី**<u>ប្រទេសមានចំណូលទាប</u>**ទៅជា**<u>ប្រទេសមានចំណូលមធ្យមកម្រិតទាប</u>** ជាមូលហេតុបណ្ដាលឱ្យប្រទេសកម្ពុជាបាត់បង់ជាបណ្ដើរៗនូវលក្ខណៈសម្បត្តិ ក្នុងការបន្តទទួលបាននូវហិរញ្ញប្បទានឥតសំណង និងឥណទានដែលមានសម្បទានខ្ពស់ ក៏ប៉ុន្តែកត្តានេះក៏បានបង្ហាញពីការកើនឡើងនៃឯករាជ្យភាពនៃថវិកាជាតិដែរ។



www.yerngshare.blogspot.com

## ៣.២ ស្ថានភាពចំណាយថវិការដ្ឋ



២០១៦

រាជរដ្ឋាភិបាលនឹងត្រូវការចំណាយថវិកាសរុបចំនួន
១៨ ២៨៣ ៧១៩ លានរៀល មានកំណើន

**១៦,៥%** គឺត្រូវជា **២២,៣២%** នៃ ផសស

**ចំណាយចរន្ត**



**បន្ទុកបុគ្គលិក**

ថ្នាក់ជាតិ÷ ៥ ៦៣៦ ៣៣៩ លានរៀល

ថ្នាក់ក្រោមជាតិ÷ ២៨៥ ៦៦៣ លានរៀល



**ក្រៅបន្ទុកបុគ្គលិក**

ថ្នាក់ជាតិ÷ ៥ ៥២០ ៦៥០ លានរៀល

ថ្នាក់ក្រោមជាតិ÷ ៨៩៥ ៩៥៧ លានរៀល

**ចំណាយមូលធន**



**វិនិយោគសាធារណៈហិរញ្ញប្បទានក្នុងប្រទេស**

- ថ្នាក់ជាតិ÷ ១ ៩២៥ ០០០ លានរៀល
- ថ្នាក់ក្រោមជាតិ÷ ១៥២ ៩០៥ លានរៀល



**វិនិយោគសាធារណៈហិរញ្ញប្បទានក្រៅប្រទេស**

៣ ៨៧១ ៣៥០ លានរៀល



**ការទូទាត់ប្រាក់ខ្ចី** ៥០៩ ១៣៨ លានរៀល

- គាំទ្រការកែទម្រង់ការបោះឆ្នោត
- គាំទ្រការអនុវត្តកម្មវិធីជាតិកំណែទម្រង់រដ្ឋបាលសាធារណៈ
- គាំទ្រកំណែទម្រង់វិស័យដីធ្លី
- គាំទ្រ និងពង្រឹងគោលនយោបាយអភិវឌ្ឍន៍វិស័យឧស្សាហកម្ម
- គាំទ្រដល់ការប្រយុទ្ធប្រឆាំងអំពើពុករលួយ
- ពង្រឹងការងារកំណត់អត្តសញ្ញាណជនក្រីក្រ និងការងារស្ថិតិ

- តម្លើងបៀវត្ស ជូននគរបាល និងកម្លាំងប្រដាប់អាវុធ
- គាំទ្រកិច្ចដំណើរការរដ្ឋបាល និងអន្តរាគមន៍ផ្សេងៗ
- គាំទ្រការអនុវត្តគោលនយោបាយភូមិឃុំមានសុវត្ថិភាព
- គាំទ្រដល់ប្រតិបត្តិការផលិតអត្តសញ្ញាណប័ណ្ណ
- ផ្តល់ថវិកាគម្រោងវិនិយោគផ្ទាល់ក្នុងខេត្តឲ្យឃុំ
- ប្រយុទ្ធប្រឆាំងការជួញដូរមនុស្ស ស្ត្រី និងកុមារ
- ប្រយុទ្ធប្រឆាំងគ្រឿងញៀន
- គាំទ្រសេវាឥតគិតថ្លៃរបស់គណៈមេធាវីកម្ពុជា




- បច្ចេកទេសកសិកម្ម
- ទ្រទ្រង់មន្ទីរពិសោធន៍
- បណ្តុះបណ្តាលធនធានមនុស្ស
- គ្រប់គ្រងធនធានធម្មជាតិ
- ហេដ្ឋារចនាសម្ព័ន្ធកសិកម្ម
- បន្តជួសជុល ថែទាំ ផ្លូវ ស្ពាន
- បន្តថែទាំ និង ជួសជុលប្រព័ន្ធធារាសាស្ត្រ
- បង្កើតប្រព័ន្ធចុះបញ្ជីពាណិជ្ជកម្ម
- ត្រួតពិនិត្យសុវត្ថិភាពចំណីអាហារ
- ការអភិវឌ្ឍប្រព័ន្ធរដ្ឋបាលអេឡិចត្រូនិច
- ជំរុញផលិតកម្ម សុខភាពសត្វ និងសុវត្ថិភាពសាច់
- វិនិយោគលើការស្រាវជ្រាវពូជស្រូវ
- ពង្រឹងនូវក្របខ័ណ្ឌ និងយន្តការអភិវឌ្ឍន៍សហគ្រាសធុនតូច និងមធ្យម
- អភិវឌ្ឍប្រព័ន្ធស្តង់ដា និងមាត្រាសាស្ត្រ

- តំឡើងបៀវត្ស
- គាំទ្រសេវា និងគុណភាពអប់រំ
- អភិវឌ្ឍជំនាញ និងវិស័យការងារ
- គុណភាពសេវាសុខាភិបាល
- ទប់ស្កាត់អំពើហិង្សាលើស្ត្រី និងកុមារ
- ការពារ និងអភិរក្សធនធានធម្មជាតិ
- អភិរក្ស និងអភិវឌ្ឍវប្បធម៌ជាតិ
- សុខដុមនីយកម្មសាសនា

## ៣.៣ ថវិកាកម្មវិធីរបស់ក្រសួង ស្ថាប័ន

ស្របតាម **ឯកសារទស្សនាទានស្តីពីទិសដៅយុទ្ធសាស្ត្រកំណែទម្រង់ប្រព័ន្ធថវិកានៅកម្ពុជា** ២០១៣-២០២០ រាជរដ្ឋាភិបាលបានដាក់ឱ្យអនុវត្តសាកល្បងថវិកាកម្មវិធីពេញលេញជាដំហ៊ានៗ




១. ក្រ. ពត៌មាន,
២. ក្រ. បរិស្ថាន,
៣. ក្រ. សង្គមកិច្ច,
៤. អាកាសចរស៊ីវិល,
៥. ក្រ. ពាណិជ្ជកម្ម,
៦. ក្រ. ប្រៃសណីយ៍,
៧. ក្រ. ទេសចរណ៍,
៨. ក្រ. ធនធានទឹក,
៩. តុលាការកំពូល,
១០. សាលាឧទ្ធរណ៍
១១. អគ្គ. រដ្ឋសភា,
១២. អគ្គ. ព្រឹទ្ធសភា,
១៣. ក្រ. ការបរទេស,
១៤. អាជ្ញាធរសវនកម្មជាតិ,
១៥. អង្គភាពប្រឆាំងអំពើពុករលួយ,

២០១៦

២០១៥

១. ក្រ. អប់រំ,
២. ក្រ. សុខាភិបាល,
៣. ក្រ. ការងារ,
៤. ក្រ. កិច្ចការនារី,
៥. ក្រ. កសិកម្ម,
៦. ក្រ. អភិវឌ្ឍជនបទ,
៧. ក្រ. សាធារណៈការ,
៨. ក្រ. សេដ្ឋកិច្ច និងហិរញ្ញវត្ថុ,
៩. ក្រ. ដែនដី,
១០. ក្រ. យុត្តិធម៌

២០១៨

គ្រប់ក្រសួង ស្ថាប័ន ថ្នាក់ជាតិ និង ថ្នាក់ក្រោមជាតិ ត្រូវអនុវត្តថវិកាកម្មវិធីពេញលេញ។



**ក្រសួងអប់រំ យុវជន និងកីឡា** មានគោលនយោបាយចំនួន២ គឺ÷



ទី ១ ÷ ធានាលទ្ធភាពទទួលបាន សេវាអប់រំ ប្រកបដោយសមធម៌

ទី ២ ÷ លើកកម្ពស់គុណភាព និងភាពឆ្លើយតប

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន៥ គឺ÷

២ ០២៩ ៥៩៧ លានរៀល

១. ការអភិវឌ្ឍការអប់រំក្នុងប្រព័ន្ធ ក្រៅប្រព័ន្ធ និងមិនផ្លូវការ
២. ការអភិវឌ្ឍឧត្តមសិក្សានិងការស្រាវជ្រាវ
៣. ការអភិវឌ្ឍវិស័យអប់រំកាយនិងកីឡា
៤. ការអភិវឌ្ឍជំនាញបច្ចេកទេសនិងជំនាញទន់សម្រាប់យុវជន
៥. ការគាំទ្រសេវាអប់រំ និងអភិបាលកិច្ចល្អ

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវីធីដូចមានក្នុង <u>តារាង ១នៃឧបសម្ព័ន្ធ</u>



**ក្រសួងសុខាភិបាល** មានគោលនយោបាយចំនួន ១ គឺ÷

អភិវឌ្ឍន៍ប្រព័ន្ធសុខាភិបាល ដោយផ្តល់លទ្ធភាពទទួលបាននូវសេវាសុខភាព ប្រកបដោយ គុណភាព និងសមធម៌ ដើម្បីកែលម្អស្ថានភាពសុខភាព និងសុខុមាលភាពប្រជាពលរដ្ឋកម្ពុជាគ្រប់រូបផ្តោតលើស្ត្រី កុមារ ជនក្រីក្រ ជន-ងាយរងគ្រោះ និងចាស់ជរា។

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន ៤ គឺ÷

១ ១១០ ៧៩១ លានរៀល

១. សុខភាពបន្តពូជយុវវ័យ មាតា ទារក កុមារ និងអាហាររូបត្ថម្ភ
២. ប្រយុទ្ធជំងឺឆ្លង
៣. ប្រយុទ្ធជំងឺមិនឆ្លង និងបញ្ហាសុខភាពសាធារណៈដទៃទៀត
៤. ពង្រឹងប្រព័ន្ធសុខាភិបាល

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវីធីដូចមានក្នុង <u>តារាង ២នៃឧបសម្ព័ន្ធ</u>



**ក្រសួងការងារ និងបណ្តុះបណ្តាលវិជ្ជាជីវៈ** មានគោលនយោបាយចំនួន ១ គឺ÷ ការអភិវឌ្ឍវិស័យការងារ និងបណ្តុះបណ្តាលវិជ្ជាជីវៈ ដើម្បីចូលរួមកាត់បន្ថយភាពក្រីក្រនៅកម្ពុជា។



ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន៥ គឺ÷

១៧១ ៣០០ លានរៀល

១. ការអភិវឌ្ឍលក្ខខណ្ឌការងារ និងសុខដុមនីយកម្មទំនាក់ទំនងវិជ្ជាជីវៈ

២. ការអភិវឌ្ឍការអប់រំបណ្តុះបណ្តាលបច្ចេកទេស និងវិជ្ជាជីវៈ

៣. ការអភិវឌ្ឍមុខរបរ និងការងារ ដើម្បីលើកកម្ពស់ការផ្តល់សេវាការងារ និងព័ត៌មានទីផ្សារការងារនៅកម្ពុជាប្រកបដោយគុណភាព និងប្រសិទ្ធភាព

៤. ការអភិវឌ្ឍរបបសន្តិសុខសង្គម

៥. ការពង្រឹងសេវាគាំទ្រទូទៅ

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវិធីដូចមានក្នុង <u>តារាង ៣នៃឧបសម្ព័ន្ធ</u>




**ក្រសួងកិច្ចការនារី**មានគោលនយោបាយចំនួន ១ គឺ÷ ការលើកកម្ពស់ស្ថានភាព សេដ្ឋកិច្ច សង្គម និងនយោបាយរបស់ស្ត្រីឱ្យក្លាយជាកម្លាំងចលករសម្រាប់ការអភិវឌ្ឍប្រទេស និងសុភមង្គលគ្រួសារ។

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន ៤ គឺ÷

៨០ ៦៧៨ លានរៀល

១. កែប្រែស្ថានភាពសេដ្ឋកិច្ច  សង្គមរបស់ស្ត្រី

២. កិច្ចការពារផ្លូវច្បាប់ចំពោះស្ត្រី និងក្មេងស្រី

៣. ការបញ្ជ្រាបយេនឌ័រក្នុងគោលនយោបាយជាតិ និងតាមវិស័យ

៤. ការគ្រប់គ្រង និងអភិវឌ្ឍន៍ស្ថាប័ន

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវិធីដូចមានក្នុង <u>តារាង ៤នៃឧបសម្ព័ន្ធ</u>



**ក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ** មានគោលនយោបាយចំនួន ១ គឺ÷ ជម្រុញកំណើនក្នុងវិស័យកសិកម្មឲ្យបានក្នុងរង្វង់៥%ក្នុងមួយឆ្នាំ តាមរយៈលើក-កម្ពស់ផលិតភាពពិពិធភាវូបនីយកម្មកសិកម្ម និងពាណិជ្ជូបនីយកម្ម កសិកម្ម និងការលើកកម្ពស់ការចិញ្ចឹមសត្វ និងវារីវប្បកម្ម ដោយយកចិត្តទុកដាក់ខ្ពស់លើកាការពារ និងការគ្រប់គ្រងធនធានព្រៃឈើ និងជលផលប្រកបដោយ ចីរភាព។

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន៥ គឺ÷

**១៨៨ ០២៥ លានរៀល**

1. បង្កើនផលិតភាព ពិពិធកម្មកសិកម្ម និងពាណិជ្ជូបនីយកម្មកសិកម្ម
2. ជម្រុញផលិតកម្មសត្វ និងសុខភាពសត្វ
3. ការគ្រប់គ្រងធនធានជលផលប្រកបដោយនិរន្តរភាព
4. ការគ្រប់គ្រងធនធានព្រៃឈើ និងសត្វព្រៃប្រកបដោយនិរន្តរភាព
5. ពង្រឹងស្ថាប័ន បង្កើនប្រសិទ្ធភាពសេវាគាំទ្រ និងអភិវឌ្ឍន៍ធនធានមនុស្ស

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវីធីដូចមានក្នុង <u>តារាង ៥នៃឧបសម្ព័ន្ធ</u>



**ក្រសួងអភិវឌ្ឍន៍ជនបទ** មានគោលនយោបាយចំនួន ២ គឺ÷

ទី ១ ÷ ធានាលើកកម្ពស់កម្រិតជីវភាពរស់នៅ របស់ប្រជាពលរដ្ឋជនបទ ឱ្យមានគម្លាតខិតជិតទីប្រជុំជននៅឆ្នាំ២០២៥

ទី ២ ÷ ជម្រុញកំណើនសេដ្ឋកិច្ចជនបទ តាមរយៈការអភិវឌ្ឍន៍ជនបទ ចម្រុះដោយមានការចូលរួមពីសហគមន៍ជាតិ និងអន្តរជាតិ

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន៣ គឺ÷

**២៦៦ ១២៥ លានរៀល**

1. បន្តស្តារថែទាំ និងកែលម្អរហេដ្ឋារចនាសម្ព័ន្ធផ្លូវជនបទ
2. បន្តលើកកម្ពស់កម្រិតជីវភាពប្រជាពលរដ្ឋជនបទ
3. ការកសាង និងលើកកម្ពស់សមត្ថភាព

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវីធីដូចមានក្នុង <u>តារាង ៦នៃឧបសម្ព័ន្ធ</u>






**ក្រសួងសាធារណការនិងដឹកជញ្ជូន** មានគោលនយោបាយចំនួន ១ គឺ÷ អភិវឌ្ឍន៍ ថែទាំ និងគ្រប់គ្រងសំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន មធ្យោបាយសេវាកម្មដឹកជញ្ជូនគ្រប់ប្រភេទ និងភស្តុភារកម្មប្រកបដោយសុវត្ថិភាព និងប្រសិទ្ធភាព ។

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន៤ គឺ÷

**៣៦៦ ២៧៨ លានរៀល**

១. អភិវឌ្ឍន៍ ថែទាំ និងគ្រប់គ្រងសំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន និង ភស្តុភារកម្ម

២. អភិវឌ្ឍន៍ ថែទាំ គ្រប់គ្រងហេដ្ឋារចនាសម្ព័ន្ធសេវាកម្ម និងសុវត្ថិភាពផ្លូវដែក

៣. ពង្រឹងការគ្រប់គ្រងចរាចរណ៍/មធ្យោបាយសេវាកម្ម អាជីវកម្ម ប្រព័ន្ធដឹកជញ្ជូន និង ភស្តុភារកម្មគ្រប់ប្រភេទដោយសុវត្ថិភាព និងប្រសិទ្ធភាព

៤. គាំទ្រគោលនយោបាយសាធារណការ ដឹកជញ្ជូន ការអភិវឌ្ឍធនធានមនុស្ស និងគ្រប់គ្រងរដ្ឋបាលទូទៅ

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវិធីដូចមានក្នុង តារាង ៧នៃឧបសម្ព័ន្ធ



**ក្រសួងរៀបចំដែនដី នគរូបនីយកម្ម និងសំណង់** មានគោលនយោបាយចំនួន ១ គឺ÷ កំណែទម្រង់វិស័យដីធ្លី និងការអភិវឌ្ឍន៍វិស័យសំណង់

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន៥ គឺ÷

**៦៣ ៨២៥ លានរៀល**

១. ពង្រឹងការគ្រប់គ្រងដីធ្លី

២. ពង្រឹងការរៀបចំដែនដី និងបែងចែកដីក្នុងគោលដៅសម្បទាន ដីសង្គមកិច្ច

៣. ពង្រឹងការគ្រប់គ្រងវិស័យសំណង់

៤. ការគាំទ្រដំណើរការរដ្ឋបាល និងអភិវឌ្ឍន៍ស្ថាប័ន

៥. ការងារលំនៅឋាន

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវិធីដូចមានក្នុង តារាង ៨នៃឧបសម្ព័ន្ធ

www.yerngshare.blogspot.com




**ក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុ** មានគោលនយោបាយចំនួន ២ គឺ÷

ទី ១ ÷ ពង្រឹង និងបង្កើនប្រសិទ្ធភាពគ្រប់គ្រងសេដ្ឋកិច្ច និង ការអភិវឌ្ឍន៍វិស័យហិរញ្ញវត្ថុ

ទី ២ ÷ ពង្រឹង និងបង្កើនស័ក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការ គ្រប់គ្រងហិរញ្ញវត្ថុសាធារណៈ និង ទ្រព្យសម្បត្តិរដ្ឋ

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធី ចំនួន៥ គឺ÷

១. ពង្រឹង និងបង្កើនប្រសិទ្ធភាពនៃការគ្រប់គ្រងសេដ្ឋកិច្ច
២. ពង្រឹង និងបង្កើនប្រសិទ្ធភាពនៃការគ្រប់គ្រង ការត្រួតពិនិត្យ និង ការអភិវឌ្ឍន៍វិស័យហិរញ្ញវត្ថុ
៣. ពង្រឹង និងបង្កើនស័ក្តិសិទ្ធភាពនិងប្រសិទ្ធភាពនៃការគ្រប់គ្រង ការ គៀរគរចំណូលថវិកាជាតិ និងទ្រព្យសម្បត្តិរដ្ឋ
៤. ពង្រឹង និងបង្កើនស័ក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការគ្រប់គ្រង ចំណាយសាធារណៈ
៥. ពង្រឹង និងបង្កើនស័ក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការគាំទ្រទូទៅ និងការធានាគណនេយ្យភាពក្នុងការគ្រប់គ្រងហិរញ្ញវត្ថុសាធារណៈ

៥០២ ១៣៥
លានរៀល

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវិធី ដូចមានក្នុង តារាង ៩ នៃឧបសម្ព័ន្ធ



**ក្រសួងយុត្តិធម៌**មានគោលនយោបាយចំនួន ១ គឺ÷

បង្កើនប្រសិទ្ធភាពនៃការផ្តល់សេវាយុត្តិធម៌ប្រកបដោយសច្ចភាព ស្មើភាព និងតម្លាភាព។

ដើម្បីសម្រេចគោលបំណងគោលនយោបាយខាងលើ ក្រសួងបានរៀបចំកម្មវិធីចំនួន៣ អនុកម្មវិធីចំនួន ១១ ដែលគ្របដណ្តប់លើកិច្ចការរបស់ក្រសួងយុត្តិធម៌ (ទីស្តីការក្រសួង តុលាការកំពូល សាលាឧទ្ធរណ៍ ឧត្តមក្រុមប្រឹក្សានៃអង្គចៅក្រម និងសាលាដំបូងរាជធានី-ខេត្ត) គឺ÷

៩៤ ២៣៩
លានរៀល

១. កិច្ចការច្បាប់

២. កិច្ចការតុលាការ

៣. សេវាគាំទ្រទូទៅ

គម្រោងចំណាយថវិកាឆ្នាំ ២០១៦ ត្រូវបានបែងចែកទៅតាមកម្មវិធី និងអនុកម្មវីធីដូចមានក្នុង <u>តារាង ១០ នៃឧបសម្ព័ន្ធ</u>

# ៣.៤ គម្រោងថវិការដ្ឋបាលថ្នាក់ក្រោមជាតិ




គម្រោងចំណូល-ចំណាយរបស់រដ្ឋបាលរាជធានី-ខេត្ត ក្រុង-ស្រុក និង ឃុំ-សង្កាត់ មានឱនភាពថវិកាចំនួន ៥១៣ ២៨៣ លានរៀល ដែលត្រូវបានឧបត្ថម្ភដោយថវិកាថ្នាក់ជាតិ ហើយការឧបត្ថម្ភនេះមានកំណើន ១៥,៩% ធៀបនឹងច្បាប់ឆ្នាំ ២០១៥ ហើយត្រូវជា ០,៦៣% នៃ ផសស ។

**អាទិភាពចំណាយ** ត្រូវបានផ្តល់ជាពិសេស ដល់ការតម្លើងប្រាក់បៀវត្ស ជូនដល់÷



១. ក្រុមប្រឹក្សារាជធានី ខេត្ត,
២. ក្រុង ស្រុក ខណ្ឌ,
៣. ឃុំ សង្កាត់ និង មន្ត្រីភូមិ

www.yerngshare.blogspot.com




## ៣.៥ សេចក្តីសន្និដ្ឋាន

ថវិកាឆ្នាំ២០១៦ អាចប្រសិទ្ធនាមបានថាជា "*ថវិកានៃការប្រមូលពួតផ្តុំនូវកម្លាំង និងធនធាន សំដៅសម្រេចបាននូវសមិទ្ធផលសំខាន់ៗបន្ថែមទៀត ដើម្បីធានាបាននូវដំណើរផ្លាស់ប្តូរមួយ ឆ្ពោះទៅរកការអភិវឌ្ឍប្រកបដោយគុណភាព និងចីរភាព ដោយផ្សារភ្ជាប់ការគិតគូរអំពីតុល្យភាពនៃកំណើនសេដ្ឋកិច្ច និងការបែងចែកផលនៃកំណើននេះ ទៅនឹងជីវភាពរស់នៅប្រចាំថ្ងៃ និងបំណងប្រាថ្នារបស់ប្រជាជន ព្រមទាំងឆ្លើយតបទៅនឹងបរិការណ៍ថ្មីរបស់កម្ពុជា និងនិន្នាការពិភពលោក និងតំបន់ ដើម្បីនាំនាវាកម្ពុជាឆ្ពោះទៅកាន់ត្រើយសុខសន្តិភាពយូរអង្វែង វិបុលភាព និងយុត្តិធម៌សង្គម*" ។

# ជំពូក ៤ ឧបសម្ព័ន្ធថវិកាកម្មវិធីនៃក្រសួង ស្ថាប័នសំខាន់ៗ

(ឯកតា លានរៀល)

| តារាង ១ ÷ គម្រោងចំណាយថវិកាក្រសួងអប់រំ យុវជន និងកីឡា តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| សរុបរួម | 2,029,896.9 |
| ១.កម្មវិធីទី១៖ ការអភិវឌ្ឍការអប់រំក្នុងប្រព័ន្ធ ក្រៅប្រព័ន្ធ និងមិនផ្លូវការ | 244,422.4 |
| ១.១ អនុកម្មវិធីទី១៖ ការពង្រីកការអប់រំកុមារតូច | 3,909.9 |
| ១.២ អនុកម្មវិធីទី២៖ ការពង្រឹងគុណភាព និងប្រសិទ្ធភាពនៃការអប់រំនៅបឋមសិក្សា | 4,009.5 |
| ១.៣ អនុកម្មវិធីទី៣៖ ការចូលរៀនប្រកបដោយសមធម៌ ការពង្រឹងគុណភាពនិងប្រសិទ្ធភាពនៃការអប់រំនៅមធ្យមសិក្សា | 23,192.9 |
| ១.៤ អនុកម្មវិធីទី៤៖ ការពង្រីកការអប់រំក្រៅប្រព័ន្ធ | 4,360.3 |
| ១.៥ អនុកម្មវិធីទី៥៖ ការពង្រឹង និងការពង្រីកកម្មវិធីលើកកម្ពស់សុខភាពសិក្សា | 679.0 |
| ១.៦ អនុកម្មវិធីទី៦៖ លើកកម្ពស់គុណភាព និងប្រសិទ្ធភាពនៃការអនុវត្តកម្មវិធីអប់រំបច្ចេកទេស | 6,272.4 |
| ១.៧ អនុកម្មវិធីទី៧៖ ការអភិវឌ្ឍការងារបណ្តុះបណ្តាល និងរឹត្រឹតការគ្រូបង្រៀន | 12,142.5 |
| ១.៨ អនុកម្មវិធីទី៨៖ ការអភិវឌ្ឍកម្មវិធីសិក្សា សម្ភារៈសិក្សា និងបណ្ណាល័យ | 28,964.7 |
| ១.៩ អនុកម្មវិធីទី៩៖ សេវាគាំទ្រការអភិវឌ្ឍការអប់រំក្នុងប្រព័ន្ធ ក្រៅប្រព័ន្ធ និងមិនផ្លូវការរបស់មន្ទីរជំនាញរាជធានី ខេត្ត | 160,891.2 |
| ២.កម្មវិធីទី២៖ ការអភិវឌ្ឍឧត្តមសិក្សា និងការស្រាវជ្រាវ | 36,879.8 |
| ២.១ អនុកម្មវិធីទី១៖ ការលើកកម្ពស់គុណភាព និងភាពឆ្លើយតបនៃការអប់រំឧត្តមសិក្សា | 3,732.8 |
| ២.២ អនុកម្មវិធីទី២៖ ការអភិវឌ្ឍការស្រាវជ្រាវនៅឧត្តមសិក្សា | 4,444.7 |
| ២.៣ អនុកម្មវិធីទី៣៖ ការពង្រឹងគុណភាពនៃការបណ្តុះបណ្តាល ការស្រាវជ្រាវ និងសេវាកម្មសង្គម | 3,632.6 |
| ២.៤ អនុកម្មវិធីទី៤៖ ការង្រឹងគុណភាពសិក្សា និងស្រាវជ្រាវលើវិស័យវប្បធម៌ និងសិល្បៈ | 459.5 |
| ២.៥ អនុកម្មវិធីទី៥៖ លើកកម្ពស់គុណភាពនៃការបណ្តុះបណ្តាល និងការស្រាវជ្រាវ | 3,811.4 |
| ២.៦ អនុកម្មវិធីទី៦៖ ការពង្រឹងគុណភាពនៃការបណ្តុះបណ្តាល និងការស្រាវជ្រាវ | 2,387.3 |
| ២.៧ អនុកម្មវិធីទី៧៖ ការពង្រឹងគុណភាព និងប្រសិទ្ធភាពនៃការបណ្តុះបណ្តាល និងស្រាវជ្រាវ | 5,783.6 |
| ២.៨ អនុកម្មវិធីទី៨៖ ការលើកកម្ពស់គុណភាពនៃការបណ្តុះបណ្តាល និងការស្រាវជ្រាវ | 3,396.0 |
| ២.៩ អនុកម្មវិធីទី៩៖ ការពង្រឹងគុណភាព និងប្រសិទ្ធភាពនៃការបណ្តុះបណ្តាល និងស្រាវជ្រាវ | 3,177.0 |
| ២.១០ អនុកម្មវិធីទី១០៖ ការពង្រឹងគុណភាពប្រសិទ្ធភាពអប់រំ និងការស្រាវជ្រាវ | 3,026.5 |
| ២.១៣ អនុកម្មវិធីទី១៣៖ ការទទួលស្គាល់គុណភាពអប់រំ | 2,410.2 |
| ២.១៤ អនុកម្មវិធីទី១៤៖ ការពង្រឹងគុណភាព និងប្រសិទ្ធភាពនៃការបណ្តុះបណ្តាល និងស្រាវជ្រាវ | 618.2 |
| ៣.កម្មវិធីទី៣៖ ការអភិវឌ្ឍវិស័យអប់រំកាយ និងកីឡា | 56,986.0 |
| ៣.១ អនុកម្មវិធីទី១៖ ការអភិវឌ្ឍកីឡាមហាជន | 12,677.9 |

| តារាង ១ ÷ គម្រោងចំណាយថវិកាក្រសួងអប់រំ យុវជន និងកីឡា តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| ៣.២ អនុកម្មវិធីទី២៖ ការអភិវឌ្ឍអប់រំកាយ និងកីឡាសិស្ស-និស្សិត | 9,491.6 |
| ៣.៣ អនុកម្មវិធីទី៣៖ ការបណ្តុះបណ្តាលធនធានមនុស្សផ្នែកអប់រំកាយ និងកីឡា | 3,514.5 |
| ៣.៤ អនុកម្មវិធីទី៤៖ ការអភិវឌ្ឍកីឡាកម្រិតខ្ពស់ | 14,212.5 |
| ៣.៥ អនុកម្មវិធីទី៥៖ សេវាគាំទ្រការអភិវឌ្ឍវិស័យអប់រំកាយ និងកីឡារបស់មន្ទីរជំនាញរាជធានី ខេត្ត | 17,089.5 |
| **៤.កម្មវិធីទី៤៖ ការអភិវឌ្ឍជំនាញបច្ចេកទេស និងជំនាញទន់សម្រាប់យុវជន** | **12,449.9** |
| ៤.១ អនុកម្មវិធីទី១៖ ពង្រឹងសកម្មភាពយុវជន | 5,015.0 |
| ៤.២ អនុកម្មវិធីទី២៖ ការអភិវឌ្ឍមជ្ឈមណ្ឌលយុវជន | 2,385.0 |
| ៤.៣ អនុកម្មវិធីទី៣៖ សេវាគាំទ្រអភិវឌ្ឍជំនាញបច្ចេកទេស និងជំនាញទន់សម្រាប់យុវជនរបស់មន្ទីរជំនាញរាជធានី ខេត្ត | 5,049.9 |
| **៥.កម្មវិធីទី៥៖ ការគាំទ្រសេវាអប់រំ និងអភិបាលកិច្ចល្អ** | **1,679,158.8** |
| ៥.១ អនុកម្មវិធីទី១៖ ការអភិវឌ្ឍគោលនយោបាយ និងពង្រឹងប្រព័ន្ធផែនការអប់រំ | 2,311.2 |
| ៥.២ អនុកម្មវិធីទី២៖ ការគ្រប់គ្រង និងពង្រឹងប្រសិទ្ធភាពធនធានមនុស្ស | 44,571.2 |
| ៥.៣ អនុកម្មវិធីទី៣៖ ការអភិវឌ្ឍសមត្ថភាពការងារគ្រប់គ្រងផែនការហិរញ្ញវត្ថុ និងមូលដ្ឋានសម្ភារៈ | 44,584.9 |
| ៥.៤ អនុកម្មវិធីទី៤៖ ពង្រឹងការងារសវនកម្មផ្ទៃក្នុង | 782.9 |
| ៥.៥ អនុកម្មវិធីទី៥៖ ការពិនិត្យតាមដានវាយតម្លៃ និងអធិការកិច្ចប្រព័ន្ធធានាគុណភាពអប់រំ | 1,361.3 |
| ៥.៦ អនុកម្មវិធីទី៦៖ អធិការកិច្ចរដ្ឋបាល និងហិរញ្ញវត្ថុ | 565.4 |
| ៥.៧ អនុកម្មវិធីទី៧៖ ការអភិវឌ្ឍបច្ចេកវិទ្យាព័ត៌មានអប់រំ និងសហប្រតិបត្តិការក្នុងក្របខណ្ឌ SEAEO និង ASEAN | 2,575.8 |
| ៥.៨ អនុកម្មវិធីទី៨៖ ការពង្រឹងការងារនីតិកម្មសម្រាប់វិស័យអប់រំ | 1,312.8 |
| ៥.៩ អនុកម្មវិធីទី៩៖ ការពង្រឹងការគ្រប់គ្រងហេដ្ឋារចនាសម្ព័ន្ធអប់រំ | 7,909.1 |
| ៥.១០ អនុកម្មវិធីទី១០៖ ការពង្រឹងការគ្រប់គ្រង ការផ្គត់ផ្គង់សម្ភារៈ និងទ្រព្យសម្បត្តិរដ្ឋ | 4,162.8 |
| ៥.១១ អនុកម្មវិធីទី១១៖ ការអភិវឌ្ឍ និងពង្រឹងប្រសិទ្ធភាពការគ្រប់គ្រង និងការធានាភាពស័ក្តិសិទ្ធនៃសេវារដ្ឋបាលអប់រំ | 2,884.0 |
| ៥.១២ អនុកម្មវិធីទី១២៖ ការអភិវឌ្ឍកិច្ចសហប្រតិបត្តិការជាតិ អន្តរជាតិលើវិស័យអប់រំ | 5,537.7 |
| ៥.១៣ អនុកម្មវិធីទី១៣៖ ការអភិវឌ្ឍប្រព័ន្ធព័ត៌មានគ្រប់គ្រងអប់រំ | 1,782.7 |
| ៥.១៤ អនុកម្មវិធីទី១៤៖ ការស្រាវជ្រាវ និងអភិវឌ្ឍគោលនយោបាយអប់រំ | 1,495.0 |
| ៥.១៥ អនុកម្មវិធីទី១៥៖ ការអភិវឌ្ឍនិងពង្រឹងប្រព័ន្ធពិនិត្យ តាមដាន និងវាយតម្លៃ | 1,401.4 |
| ៥.១៦ អនុកម្មវិធីទី១៦៖ សេវាគាំទ្រសេវាអប់រំ និងអភិបាលកិច្ចល្អ របស់មន្ទីរជំនាញរាជធានី ខេត្ត | 1,555,920.6 |

| តារាង ២ ÷ គម្រោងចំណាយថវិកាក្រសួងសុខាភិបាល តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **សរុបរួម** | **1,110,791.3** |
| **១.កម្មវិធីទី១៖ សុខភាពបន្តពូជ យុវវ័យ មាតា ទារក កុមារ និងអាហារូបត្ថម្ភ** | **74,353.2** |
| ១.១ អនុកម្មវិធីទី១៖ អាហារូបត្ថម្ភ | 59.9 |
| ១.២ អនុកម្មវិធីទី២៖ សុខភាពបន្តពូជ | 8,757.9 |
| ១.៣ អនុកម្មវិធីទី៣៖ សុខភាពមាតា ទារក | 5,661.1 |
| ១.៤ អនុកម្មវិធីទី៤៖ សុខភាពកុមារ | 44,418.4 |
| ១.៥ អនុកម្មវិធីទី៥៖ សេវាគាំទ្រសុខភាពបន្តពូជ យុវវ័យ មាតា ទារក កុមារ និងអាហារូបត្ថម្ភ ថ្នាក់រាជធានី ខេត្ត | 15,455.9 |
| **២.កម្មវិធីទី២៖ ប្រយុទ្ធជំងឺឆ្លង** | **18,156.5** |
| ២.១ អនុកម្មវិធីទី១៖ បង្ការ និងថែទាំព្យាបាលជំងឺអេដស៍ | 10,937.6 |
| ២.២ អនុកម្មវិធីទី២៖ បង្ការ និងថែទាំព្យាបាលជំងឺរបេង | 2,923.6 |
| ២.៣ អនុកម្មវិធីទី៣៖ បង្ការ និងថែទាំព្យាបាលជំងឺគ្រុនចាញ់ និងគ្រុនឈាម | 840.3 |
| ២.៤ អនុកម្មវិធីទី៤៖ ជំងឺឆ្លងដទៃទៀត | 858.8 |
| ២.៥ អនុកម្មវិធីទី៥៖ សេវាគាំទ្រការប្រយុទ្ធជំងឺឆ្លង ថ្នាក់រាជធានី ខេត្ត | 2,596.2 |
| **៣.កម្មវិធីទី៣៖ ប្រយុទ្ធជំងឺមិនឆ្លង និងបញ្ហាសុខភាពសាធារណៈដទៃទៀត** | **3,329.1** |
| ៣.១ អនុកម្មវិធីទី១៖ សុខភាពភ្នែក | 200.0 |
| ៣.២ អនុកម្មវិធីទី២៖ សុខភាពផ្លូវចិត្ត និងបំពានគ្រឿងញៀន | 815.5 |
| ៣.៣ អនុកម្មវិធីទី៣៖ សុខភាពមាត់-ធ្មេញ | 81.6 |
| ៣.៤ អនុកម្មវិធីទី៤៖ ជំងឺរ៉ាំរ៉ៃ | 89.5 |
| ៣.៥ អនុកម្មវិធីទី៥៖ បញ្ហាសុខភាពសាធារណៈផ្សេងៗទៀត | 610.1 |
| ៣.៦ អនុកម្មវិធីទី៦៖ សេវាគាំទ្រប្រយុទ្ធជំងឺមិនឆ្លងនិងបញ្ហាសុខភាពសាធារណៈដទៃទៀត ថ្នាក់រាជធានី ខេត្ត | 1,532.4 |
| **៤.កម្មវិធីទី៤៖ ពង្រឹងប្រព័ន្ធសុខាភិបាល** | **1,014,952.5** |
| ៤.១ អនុកម្មវិធីទី១៖ ការផ្តល់សេវាសុខាភិបាល | 535,694.7 |
| ៤.២ អនុកម្មវិធីទី២៖ ហិរញ្ញប្បទានសុខាភិបាល | 61.6 |

| តារាង ២ ÷ គម្រោងចំណាយថវិកាក្រសួងសុខាភិបាល តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| ៤.៣ អនុកម្មវិធីទី៣៖ អភិវឌ្ឍន៍ធនធានមនុស្ស | 79,787.5 |
| ៤.៤ អនុកម្មវិធីទី៤៖ ប្រព័ន្ធព័ត៌មានសុខាភិបាល | 1,168.0 |
| ៤.៥ អនុកម្មវិធីទី៥៖ អភិបាលកិច្ចវិស័យសុខាភិបាល | 3,407.9 |
| ៤.៦ អនុកម្មវិធីទី៦៖ សេវាគាំទ្រការពង្រឹងប្រព័ន្ធសុខាភិបាល ថ្នាក់រាជធានី ខេត្ត | 394,832.8 |

| តារាង ៣ ÷ គម្រោងចំណាយថវិកាក្រសួងការងារ និងបណ្តុះបណ្តាលវិជ្ជាជីវៈ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **សរុបរួម** | **171,299.8** |
| **១.កម្មវិធីទី១៖ ការអភិវឌ្ឍលក្ខខណ្ឌការងារឱ្យកាន់តែប្រសើរឡើង** | **10,800.8** |
| ១.១ អនុកម្មវិធីទី១៖ បន្តលើកកម្ពស់លក្ខខណ្ឌការងារឱ្យកាន់តែប្រសើរឡើង | 1,433.8 |
| ១.២ អនុកម្មវិធីទី២៖ ពង្រឹងភាពសុខដុមរមនានៃទំនាក់ទំនងវិជ្ជាជីវៈ | 6,250.0 |
| ១.៣ អនុកម្មវិធីទី៣៖ បន្តការសិក្សាស្រាវជ្រាវប្រាក់ឈ្នួលអប្បរមា និងអត្ថប្រយោជន៍របស់កម្មករនិយោជិត | 550.0 |
| ១.៥ អនុកម្មវិធីទី៥៖ ពង្រឹង និងពង្រីកសេរីភាពអង្គការវិជ្ជាជីវៈ | 483.8 |
| ១.៦ អនុកម្មវិធីទី៦៖ ពង្រឹងការទប់ស្កាត់ការប្រើប្រាស់ពលកម្មកុមារ | 472.0 |
| ១.៧ អនុកម្មវិធីទី៧៖ សេវាគាំទ្រការអភិវឌ្ឍលក្ខខណ្ឌការងារឱ្យកាន់តែប្រសើរឡើង ថ្នាក់រាជធានី ខេត្ត | 1,611.2 |
| **២.កម្មវិធីទី២៖ ការអភិវឌ្ឍការអប់រំបណ្តុះបណ្តាលបច្ចេកទេស និងវិជ្ជាជីវៈ** | **64,791.3** |
| ២.១ អនុកម្មវិធីទី១៖ ជំរុញការកសាង និងអនុវត្តគោលនយោបាយជាតិស្តីពីការអប់រំបណ្តុះបណ្តាលបច្ចេកទេស និងវិជ្ជាជីវៈ និងផែនការនានាដើម្បីពង្រឹងគុណភាពវិស័យអប់រំ បណ្តុះបណ្តាលបច្ចេកទេស និងវិជ្ជាជីវៈ | 798.2 |
| ២.២ អនុកម្មវិធីទី២៖ ពង្រឹងយន្តការជំរុញការចុះឈ្មោះចូលរៀនរបស់សិក្ខាកាមសិស្ស និស្សិតក្នុងផ្នែកអប់រំបណ្តុះបណ្តាលបច្ចេកទេស និងវិជ្ជាជីវៈ | 62,281.3 |
| ២.៣ អនុកម្មវិធីទី៣៖ ពង្រឹងយន្តការគ្រប់គ្រងការអប់រំបណ្តុះ បណ្តាលបច្ចេកទេស និងវិជ្ជាជីវៈ | 996.1 |
| ២.៤ អនុកម្មវិធីទី៤៖ សេវាគាំទ្រការអភិវឌ្ឍការអប់រំបណ្តុះបណ្តាលបច្ចេកទេស និងវិជ្ជាជីវៈ ថ្នាក់រាជធានី ខេត្ត | 715.7 |
| **៣.កម្មវិធីទី៣៖ ការអភិវឌ្ឍមុខរបរ និងការងារ ដើម្បីលើកកម្ពស់ការផ្តល់សេវាការងារ និងព័ត៌មានទីផ្សារការងារនៅកម្ពុជាប្រកបដោយគុណភាព និងប្រសិទ្ធភាព** | **3,546.7** |
| ៣.១ អនុកម្មវិធីទី១៖ ជំរុញការកសាង និងអនុវត្តគោលនយោបាយជាតិស្តីពីមុខរបរ និងការងារ | 354.3 |
| ៣.២ អនុកម្មវិធីទី២៖ ពង្រឹងយន្តការផ្តល់សេវាមុខរបរ និងការងារ ឱ្យកាន់តែមានប្រសិទ្ធភាព និងឆ្លើយតបបានតាមតម្រូវការរបស់អ្នកប្រើប្រាស់សេវា | 1,518.0 |
| ៣.៣ អនុកម្មវិធីទី៣៖ ពង្រឹងយន្តការផ្សព្វផ្សាយ និងបញ្ជ្រាបអំពីព័ត៌មានទីផ្សារការងារ | 1,663.8 |
| ៣.៦ អនុកម្មវិធីទី៦៖ សេវាគាំទ្រការអភិវឌ្ឍមុខរបរ និងការងារ ដើម្បីលើកកម្ពស់ការផ្តល់សេវាការងារ និងព័ត៌មានទីផ្សារ ការងារនៅកម្ពុជាប្រកបដោយគុណភាព និងប្រសិទ្ធភាព ថ្នាក់រាជធានី ខេត្ត | 10.6 |
| **៥.កម្មវិធីទី៥៖ ការពង្រឹងសេវាគាំទ្រទូទៅ** | **92,161.0** |
| ៥.១ អនុកម្មវិធីទី១៖ ការបង្កើនប្រសិទ្ធភាព និងគុណភាពសេវារដ្ឋបាលសាធារណៈ | 31,287.7 |

| តារាង ៣ ÷ គម្រោងចំណាយថវិកាក្រសួងការងារ និងបណ្តុះបណ្តាលវិជ្ជាជីវៈ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| ៥.២ អនុកម្មវិធីទី២៖ ពង្រឹងការគ្រប់គ្រងហិរញ្ញវត្ថុ និងទ្រព្យសម្បត្តិរដ្ឋប្រកបដោយតម្លាភាពប្រសិទ្ធិភាព និងគណនេយ្យភាព | 16,292.8 |
| ៥.៣ អនុកម្មវិធីទី៣៖ ពង្រឹង និងពង្រីកកិច្ចសហប្រតិបត្តិការជាមួយដៃគូជាតិ និងអន្តរជាតិ | 3,109.0 |
| ៥.៤ អនុកម្មវិធីទី៤៖ ពង្រឹងយន្តការកសាងផែនការ ស្ថិតិ និងនីតិកម្ម | 363.3 |
| ៥.៥ អនុកម្មវិធីទី៥៖ ពង្រឹងការងារសវនកម្មផ្ទៃក្នុង និងអគ្គាធិការកិច្ច | 387.0 |
| ៥.៦ អនុកម្មវិធីទី៦៖ លើកកម្ពស់សមភាពយេនឌ័រក្នុងវិស័យការងារ និងបណ្តុះបណ្តាលវិជ្ជាជីវៈ | 229.8 |
| ៥.៧ អនុកម្មវិធីទី៧៖ ការពង្រឹងសេវាគាំទ្រទូទៅ ថ្នាក់រាជធានី ខេត្ត | 40,491.4 |

| តារាង ៤ ÷ គម្រោងចំណាយថវិកាក្រសួងកិច្ចការនារី តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **សរុបរួម** | **40,674.2** |
| **១.កម្មវិធីទី១៖ កែប្រែស្ថានភាពសេដ្ឋកិច្ច សង្គមរបស់ស្ត្រី** | **6,684.5** |
| ១.១ អនុកម្មវិធីទី១៖ លើកកម្ពស់សីលធម៌សង្គម តម្លៃស្ត្រី និងគ្រួសារខ្មែរ | 138.1 |
| ១.២ អនុកម្មវិធីទី២៖ លើកកម្ពស់ការអប់រំ និងសុខុមាលភាពសង្គម | 285.2 |
| ១.៣ អនុកម្មវិធីទី៣៖ ការអភិវឌ្ឍន៍សេដ្ឋកិច្ចស្ត្រី និងគ្រួសារ | 4,568.0 |
| ១.៤ អនុកម្មវិធីទី៤៖ ការលើកកម្ពស់អាហារូបត្ថម្ភដល់ស្ត្រី និងកុមារ | 184.5 |
| ១.៥ អនុកម្មវិធីទី៥៖ សេវាគាំទ្រការកែប្រែស្ថានភាពសេដ្ឋកិច្ច សង្គមរបស់ស្ត្រី ថ្នាក់រាជធានី ខេត្ត | 1,508.8 |
| **២.កម្មវិធីទី២៖ កិច្ចការពារផ្លូវច្បាប់ ចំពោះស្ត្រី និងក្មេងស្រី** | **1,382.8** |
| ២.១ អនុកម្មវិធីទី១៖ ការងារទប់ស្កាត់ការរំលោភបំពានផ្លូវភេទលើស្ត្រី និងក្មេងស្រី | 209.0 |
| ២.២ អនុកម្មវិធីទី២៖ ការពង្រឹងសមត្ថភាពភ្នាក់ងារនគរបាលយុត្តិធម៌ | 167.6 |
| ២.៣ អនុកម្មវិធីទី៣៖ ការទប់ស្កាត់អំពើជួញដូរមនុស្ស និងការកេងប្រវ័ញ្ចនានា | 223.5 |
| ២.៤ អនុកម្មវិធីទី៤៖ ការទប់ស្កាត់អំពើហិង្សាក្នុងគ្រួសារ | 184.4 |
| ២.៥ អនុកម្មវិធីទី៥៖ ការលើកកម្ពស់កិច្ចការពារស្ត្រីពិការ | 97.5 |
| ២.៦.អនុកម្មវិធីទី៦៖ សេវាគាំទ្រកិច្ចការពារផ្លូវច្បាប់ចំពោះស្ត្រី និងក្មេងស្រី ថ្នាក់រាជធានី ខេត្ត | 500.8 |
| **៣.កម្មវិធីទី៣៖ ការបញ្ជ្រាបយេនឌ័រក្នុងគោលនយោបាយជាតិ និងតាមវិស័យ** | **2,774.8** |
| ៣.១ អនុកម្មវិធីទី១៖ ការអភិវឌ្ឍន៍សមត្ថភាពលើការបញ្ជ្រាបយេនឌ័រ | 186.5 |
| ៣.២ អនុកម្មវិធីទី២៖ ផ្សព្វផ្សាយកម្មវិធីនារីរតនៈ | 795.0 |
| ៣.៣ អនុកម្មវិធីទី៣៖ ការអនុវត្តអនុសញ្ញាអន្តរជាតិ ស្តីពីការលុបបំបាត់រាល់ទម្រង់រើសអើងលើនារីភេទ (CEDAW) និងសេវាជួយស្ត្រីរងគ្រោះដោយហិង្សាគ្រប់រូបភាព | 808.8 |
| ៣.៤ អនុកម្មវិធីទី៤៖ ស្ត្រី និងការធ្វើសេចក្តីសម្រេច | 163.0 |
| ៣.៥ អនុកម្មវិធីទី៥៖ សេវាគាំទ្រការលើកកម្ពស់សមភាពយេនឌ័រ ថ្នាក់រាជធានី ខេត្ត | 821.5 |
| **៤.កម្មវិធីទី៤៖ ការគ្រប់គ្រងនិងការអភិវឌ្ឍស្ថាប័ន** | **29,832.2** |
| ៤.១ អនុកម្មវិធីទី១៖ ការបញ្ជ្រាបយេនឌ័រក្នុងការរៀបចំផែនការ | 227.6 |
| ៤.២ អនុកម្មវិធីទី២៖ ពង្រឹងការងារហិរញ្ញវត្ថុ សវនកម្មផ្ទៃក្នុង និងអធិការកិច្ច | 170.4 |
| ៤.៣ អនុកម្មវិធីទី៣៖ កិច្ចសហប្រតិបត្តិការអន្តរជាតិដើម្បីសមភាពយេនឌ័រ | 96.3 |
| ៤.៤ អនុកម្មវិធីទី៤៖ ការអភិវឌ្ឍន៍សមត្ថភាពលើការងារគ្រប់គ្រងរដ្ឋបាល | 187.0 |
| ៤.៥ អនុកម្មវិធីទី៥៖ សេវាគាំទ្រដល់ការអនុវត្តន៍ផែនការយុទ្ធសាស្ត្រនារីរតនៈ | 11,105.2 |
| ៤.៦ អនុកម្មវិធីទី៦៖ សេវាគាំទ្រដល់ការអនុវត្តផែនការយុទ្ធសាស្ត្រនារីរតនៈ ថ្នាក់រាជធានី ខេត្ត | 18,045.7 |

| តារាង ៥÷ គម្រោងចំណាយថវិកាក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **សរុបរួម** | **188,024.8** |
| **១.កម្មវិធីទី១៖លើកកម្ពស់ផលិតភាពកសិកម្ម ពិពិធកម្ម និងពាណិជ្ជូបនីយកម្មកសិកម្ម** | **36,487.2** |
| ១.១.អនុកម្មវិធីទី១៖សម្របសម្រួលបច្ចេកទេស និងបង្កើនសមត្ថភាព(GDA) | 2,851.3 |
| ១.២.អនុកម្មវិធីទី២៖ជំរុញការគ្រប់គ្រងធនធានដីកសិកម្មប្រកបដោយចីរភាព(GDA) | 1,308.4 |
| ១.៣.អនុកម្មវិធីទី៣៖ជំរុញការអភិវឌ្ឍ ដំណាំស្រូវ(GDA) | 2,599.3 |
| ១.៤.អនុកម្មវិធីទី៤៖ជំរុញការអភិវឌ្ឍ ដំណាំសាកវប្បកម្ម និងដំណាំរួមផ្សំ(GDA) | 1,411.6 |
| ១.៥.អនុកម្មវិធីទី៥៖ជំរុញការអភិវឌ្ឍ ដំណាំឧស្សាហកម្ម(GDA) | 1,198.8 |
| ១.៦.អនុកម្មវិធីទី៦៖ការអភិវឌ្ឍ គ្រឿងយន្តកសិកម្ម(GDA) | 1,365.1 |
| ១.៧.អនុកម្មវិធីទី៧៖ជំរុញការអភិវឌ្ឍ ការងារការពារដំណាំ អនាម័យនិងភូតគាមអនាម័យ(GDA) | 2,328.9 |
| ១.៨.អនុកម្មវិធីទី៨៖ពង្រឹងនិងជំរុញការងារផ្សព្វផ្សាយកសិកម្ម (GDA) | 3,118.8 |
| ១.៩.អនុកម្មវិធីទី៩៖អភិវឌ្ឍន៍សហគមន៍កសិកម្ម (GDA) | 1,286.9 |
| ១.១០.អនុកម្មវិធីទី១០៖ពង្រឹង និងអភិវឌ្ឍសមត្ថភាពមន្ទីរពិសោធន៍ជាតិកសិកម្ម(GDA) | 867.7 |
| ១.១១.អនុកម្មវិធីទី១១៖ជំរុញការវិនិយោគនិងអភិវឌ្ឍន៍ដំណាំកៅស៊ូប្រកបដោយប្រសិទ្ធភាពសេដ្ឋកិច្ចខ្ពស់ និងចីរភាព | 714.3 |
| ១.១២.អនុកម្មវិធីទី១២៖ជំរុញខ្សែចង្វាក់តម្លៃកៅស៊ូឲ្យបានល្អ | 308.6 |
| ១.១៣.អនុកម្មវិធីទី១៣៖លើកកម្ពស់គុណភាពផលិតផលកៅស៊ូ | 193.9 |
| ១.១៤.អនុកម្មវិធីទី១៤៖លើកកម្ពស់ការគ្រប់គ្រងវិស័យកៅស៊ូ និងបណ្តុះបណ្តាលធនធានមនុស្សផ្នែកកៅស៊ូ | 482.9 |
| ១.១៥.អនុកម្មវិធីទី១៥៖ពង្រឹងការងាររដ្ឋបាល និងអភិបាលកិច្ចកៅស៊ូ | 1,168.3 |
| ១.១៦.អនុកម្មវិធីទី១៦៖លើកកម្ពស់ គុណភាពពូជកៅស៊ូថ្មី និងប្រសិទ្ធភាព គុណភាពផលិតផលកៅស៊ូកម្ពុជា(IRCC) | 2,035.0 |
| ១.១៧.អនុកម្មវិធីទី១៧៖ជំរុញនិងលើកកម្ពស់ការអភិវឌ្ឍកសិឧស្សាហកម្ម (DAI) | 1,479.3 |
| ១.១៨.អនុកម្មវិធីទី១៨៖ការស្រាវជ្រាវដើម្បីលើកកម្ពស់ផលិតភាពដំណាំកសិកម្ម(កាឌី) | 1,285.0 |
| ១.១៩.អនុកម្មវិធីទី១៩៖ការស្រាវជ្រាវដើម្បីលើកកម្ពស់ពិពិធកម្មដំណាំកសិកម្មនិងការផ្សព្វផ្សាយបច្ចេកវិទ្យាកសិកម្ម (កាឌី) | 1,354.0 |
| ១.២០.អនុកម្មវិធីទី២០៖ការពង្រឹងស្ថាប័ន បង្កើនប្រសិទ្ធភាពសេវាគាំទ្រនិងធនធានមនុស្សពិសោធន៍ស្រាវជ្រាកសិកម្ម(កាឌី) | 1,781.0 |
| ១.២១ អនុម្មវិធីទី ២១ ៖ការបង្កើនផលិតភាពកសិកម្ម របស់មន្ទីរជំនាញទាំង២៥ | 7,348.1 |
| **២.កម្មវិធីទី២៖ជំរុញផលិតកម្មសត្វ និងសុខភាពសត្វ** | **16,727.4** |
| ២.១.ការអនុកម្មវិធីទី១៖ការអភិវឌ្ឍការចិញ្ចឹមសត្វ និងបង្កើនផលិតកម្មសត្វ | 557.2 |

| តារាង ៥÷ គម្រោងចំណាយថវិកាក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| ២.២.អនុកម្មវិធីទី២៖ពង្រឹងសេវាកម្មសុខភាពសត្វ ការបង្ការទប់ស្កាត់ និងប្រយុទ្ធប្រឆាំងជំងឺឆ្លងសត្វ | 4,452.7 |
| ២.៣.អនុកម្មវិធីទី៣៖ ពង្រឹងការងារអធិការកិច្ច និងចត្តាឡីស័ក | 700.0 |
| ២.៤.អនុកម្មវិធីទី៤៖ ធ្វើឲ្យប្រសើរឡើងសុខភាពសាធារណៈ ពង្រឹងការគ្រប់គ្រងសត្តឃាតដ្ឋាន ការបង្ការទប់ស្កាត់ និងប្រយុទ្ធប្រឆាំងជម្ងឺសូណូស៊ីស | 394.5 |
| ២.៥.អនុកម្មវិធីទី៥៖ ការអង្កេតឃ្លាំមើលស្រាវជ្រាវជំងឺសត្វនិងធ្វើរោគវិនិច្ឆ័យសត្វ | 535.9 |
| ២.៦.អនុកម្មវិធីទី៦៖ ការស្រាវជ្រាវ ផលិតកម្មសត្វ សេនេទិចសត្វ ចំណីសត្វនិងការបង្កាត់ពូជសត្វ | 1,119.1 |
| ២.៧.អនុកម្មវិធីទី៧៖ពង្រឹងសមត្ថភាពអង្គភាពការអនុវត្តច្បាប់ និងការអភិវឌ្ឍធនធានមនុស្ស | 290.6 |
| ២.៨.អនុកម្មវិធីទី៨៖ពង្រឹងការអនុវត្តគោលនយោបាយ កម្មវិធី ផែនការយុទ្ធសាស្ត្រថវិកា និងបង្កើនប្រសិទ្ធភាពសេវាគាំទ្រផលិតកម្មសត្វ | 5,254.9 |
| ២.៩.អនុកម្មវិធីទី៩៖ជំរុញការផ្សព្វផ្សាយបច្ចេកទេសចិញ្ចឹមសត្វ និងសុខភាពសត្វ | 482.1 |
| ២.១០ អនុម្មវិធីទី ១០ ៖ជំរុញការចិញ្ចឹមសត្វ របស់មន្ទីរជំនាញទាំង២៥ | 2,940.4 |
| **៣.កម្មវិធីទី៣៖ការគ្រប់គ្រងធនធានជលផល ប្រកបដោយនិរន្តរភាព** | **22,584.3** |
| ៣.១.អនុកម្មវិធីទី១៖ពង្រឹងការគ្រប់គ្រងនិងអភិវឌ្ឍន៍សហគមន៍នេសាទ | 681.8 |
| ៣.២.អនុកម្មវិធីទី២៖ការគ្រប់គ្រងដែននេសាទ | 438.1 |
| ៣.៣.អនុកម្មវិធីទី៣៖ជំរុញការអភិវឌ្ឍន៍វារីវប្បកម្ម | 1,106.0 |
| ៣.៤.អនុកម្មវិធីទី៤៖ការអភិវឌ្ឍនធនធានមនុស្សនិងការការពារប្រភពធនធានជលផល | 4,644.6 |
| ៣.៥.អនុកម្មវិធីទី៥៖ការសិក្សាស្រាវជ្រាវ និងអភិវឌ្ឍន៍ជលផលទឹកសាប | 451.0 |
| ៣.៦.អនុកម្មវិធីទី៦៖ការសិក្សាស្រាវជ្រាវនិងអភិវឌ្ឍន៍ជលផលសមុទ្រ | 168.1 |
| ៣.៧.អនុកម្មវិធីទី៧៖សិក្សាស្រាវជ្រាវបច្ចេកទេសវារីវប្បកម្ម | 746.1 |
| ៣.៨.អនុកម្មវិធីទី៨៖ ការធ្វើឲ្យប្រសើរឡើងផ្នែកកែច្នៃជលផល | 109.2 |
| ៣.៩.អនុកម្មវិធីទី៩៖ ការការពារនិងអភិរក្សធនធានជលផល | 2,004.1 |
| ៣.១០.អនុកម្មវិធីទី១០៖ការអនុវត្តក្របខ័ណ្ឌផែនការយុទ្ធសាស្ត្រសម្រាប់វិស័យជលផល | 337.3 |
| ៣.១១.អនុកម្មវិធីទី១១៖អភិបាលកិច្ច និងប្រតិបត្តិការទូទៅរបស់រដ្ឋបាលជលផល | 11,898.0 |
| **៤.កម្មវិធីទី៤៖ការគ្រប់គ្រងធនធានព្រៃឈើ និងសត្វព្រៃប្រកបដោយនិរន្តរភាព** | **26,286.9** |
| ៤.១.អនុកម្មវិធីទី១៖ការគ្រប់គ្រងនិងអភិវឌ្ឍន៍ព្រៃឈើ និងសហគមន៍ព្រៃឈើ | 321.6 |
| ៤.២.អនុកម្មវិធីទី២៖ការអភិវឌ្ឍចម្ការឈើដាំ និងរុក្ខវប្បកម្ម | 3,727.2 |
| ៤.៣.អនុកម្មវិធីទី៣៖ការអភិរក្សសត្វព្រៃ និងជីវចម្រុះ | 792.3 |
| ៤.៤.អនុកម្មវិធីទី៤៖ការសង្គ្រោះ ស្តារលទ្ធភាពជីវសាស្ត្រ បង្កាត់ពូជ និងដោះលែងសត្វព្រៃចូលក្នុងដែនព្រៃធម្មជាតិ | 830.7 |

| តារាង ៥÷ គម្រោងចំណាយថវិកាក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| ៤.៥.អនុកម្មវិធីទី៥៖ការគ្រប់គ្រង និងអភិវឌ្ឍឧស្សាហកម្មព្រៃឈើ ពាណិជ្ជកម្ម និង សហប្រតិបត្តិការអន្តរជាតិ | 898.9 |
| ៤.៦.អនុកម្មវិធីទី៦៖ការងារស្រាវជ្រាវនិងពង្រឹងសមត្ថភាពក្នុងវិស័យព្រៃឈើ | 192.1 |
| ៤.៧.អនុកម្មវិធីទី៧៖គម្រោងពង្រឹងការអនុវត្តច្បាប់ដើម្បីថែរក្សា ការពារព្រៃឈើ ប្រកបដោយនិរន្តរភាព | 1,243.2 |
| ៤.៨.អនុកម្មវិធីទី៨៖បង្កើនប្រសិទ្ធភាពនៃការអនុវត្តផែនការ និងការគ្រប់គ្រងថវិកា | 18,280.9 |
| **៥.កម្មវិធីទី៥៖ពង្រឹងស្ថាប័ន បង្កើនប្រសិទ្ធភាពសេវាគាំទ្រ និងអភិវឌ្ឍន៍ធនធានមនុស្សក្នុងវិស័យកសិកម្ម** | **85,939.0** |
| ៥.១.អនុកម្មវិធីទី១៖លើកកម្ពស់ការកសាងនិងការអនុវត្តផែនការគោលនយោបាយ និងវិនិយោគកសិកម្ម (នផក) | 2,326.9 |
| ៥.២.អនុកម្មវិធីទី២៖បង្កើនប្រសិទ្ធភាពការរៀបចំ គ្រប់គ្រង និងការអនុវត្តថវិកា (នគហ) | 2,689.0 |
| ៥.៣.អនុកម្មវិធីទី៣៖ពង្រឹងការគ្រប់គ្រងស្ថាប័ននិងអភិវឌ្ឍន៍ធនធានមនុស្ស(នបុ.អភធ) | 11,298.5 |
| ៥.៤.អនុកម្មវិធីទី៤៖បង្កើនប្រសិទ្ធភាពការងារសវនកម្មផ្ទៃក្នុង (នសវក) | 900.3 |
| ៥.៥.អនុកម្មវិធីទី៥៖លើកកម្ពស់សមត្ថភាព និងប្រសិទ្ធភាពការងារសហប្រតិបត្តិការអន្តរជាតិ (នសហ) | 2,963.1 |
| ៥.៦.អនុកម្មវិធីទី៦៖ការពង្រឹងប្រសិទ្ធភាពនៃការអនុវត្តច្បាប់ស្តីពីការគ្រប់គ្រងថ្នាំកសិកម្មនិងជីកសិកម្ម (ននក) | 966.8 |
| ៥.៧.អនុកម្មវិធីទី៧៖ពង្រឹងការងាររដ្ឋបាល និងការបញ្ញាបយេនឌ័រ (នាយកដ្ឋានកិច្ចការរដ្ឋបាល) | 5,391.0 |
| ៥.៨.អនុកម្មវិធីទី៨៖បង្កើនប្រសិទ្ធភាពការងារអធិការកិច្ច | 765.9 |
| ៥.៩.អនុកម្មវិធីទី៩៖ការគ្រប់គ្រង ឯកសារនិងប្រព័ន្ធព័ត៌មានកសិកម្ម (AIDOC) | 530.2 |
| ៥.១០.អនុកម្មវិធីទី១០៖ពង្រឹងគុណភាពអប់រំ និងបណ្តុះបណ្តាលធនធានមនុស្សលើបច្ចេកទេសកសិកម្មនៅសាកលវិទ្យាល័យភូមិន្ទកសិកម្ម (សភក) | 3,650.0 |
| ៥.១១.អនុកម្មវិធីទី១១៖លើកកម្ពស់គុណភាពអប់រំនិងបណ្តុះបណ្តាលបច្ចេកទេសកសិកម្មនៅសាលាជាតិកសិកម្មព្រែកលៀប | 4,875.9 |
| ៥.១២.អនុកម្មវិធីទី១២៖ពង្រឹងគុណភាពប្រព័ន្ធអប់រំនិងបណ្តុះបណ្តាលធនធានមនុស្សវិស័យកសិកម្មរបស់សាលាកសិកម្មកំពង់ចាម | 2,905.2 |
| ៥.១៣ អនុម្មវិធីទី ១៣ ៖ការពង្រឹងសេវាគាំទ្ររដ្ឋបាល របស់មន្ទីរជំនាញទាំង២៥ | 46,676.2 |

| តារាង ៦÷ គម្រោងចំណាយថវិកាក្រសួងអភិវឌ្ឍន៍ជនបទតាមកម្មវិធី និងអនុកម្មវិធី | ២០១៦ |
| --- | --- |
| **សរុបរួម** | **286,124.5** |
| **១. កម្មវិធីទី១.ស្តារ និងកែលម្អហេដ្ឋារចនាសម្ព័ន្ធជនបទ** | **230,532.1** |
| ១.១.អនុកម្មវិធីទី១-ការជួសជុលថែទាំ និងកែលម្អផ្លូវជនបទ | 69,199.5 |
| ១.២.អនុកម្មវិធីទី២.រៀបចំបញ្ជីសារពើភ័ណ្ឌ ផែនទី និងស្លាកសញ្ញាចរាចរផ្លូវជនបទ | 670.0 |
| ១.៣.អនុកម្មវិធី៣.បដិភាគគម្រោង RIP 3 | 8,800.0 |
| ១.៤.អនុកម្មវិធី៤.ការជួសជុលផ្លូវជនបទដោយថវិកាជំពូក២១ | 140,000.0 |
| ១.៥ អនុម្មវិធីទី ៥ ៖ការជួសជុលថែទាំ និងការសាងផ្លូវជនបទ របស់មន្ទីរជំនាញទាំង២៥ | 11,862.6 |
| **២. កម្មវិធីទី២.លើកកម្ពស់គុណភាពនៃការផ្តល់សេវាសាធារណៈជនបទ** | **13,837.4** |
| ២.១ អនុកម្មវិធីទី១៖ ជម្រុញផ្តល់សេវាផ្គត់ផ្គង់ទឹកជនបទ | 5,641.0 |
| ២.២.អនុកម្មវិធីទី ២ ៖ ការលើកកម្ពស់អនាម័យនៅជនបទ | 3,333.0 |
| ២.៣.អនុកម្មវិធីទី ៣ ៖ អភិវឌ្ឍន៍ចម្រុះសម្រាប់សហគមន៍ជនបទ | 1,366.0 |
| ២.៤.អនុកម្មវិធីទី ៤ ៖ អភិវឌ្ឍន៍អភិរក្សសហគមន៍ជនជាតិដើមភាគតិច | 300.0 |
| ២.៥.អនុកម្មវិធីទី ៥ ៖លើកកម្ពស់សេដ្ឋកិច្ចគ្រួសារជនបទ | 430.0 |
| ២.៦ អនុម្មវិធីទី ៦ ៖ការផ្តល់សេវាទឹកស្អាត និងអនាម័យជនបទ របស់មន្ទីរជំនាញទាំង២៥ | 2,767.4 |
| **៣. កម្មវិធីទី៣.ការអភិវឌ្ឍធនធានមនុស្ស និងពង្រឹងស្ថាប័ន** | **41,755.0** |
| ៣.១. អនុកម្មវិធីទី១៖ការកសាងផែនការអភិវឌ្ឍន៍ជនបទ | 590.0 |
| ៣.២.អនុកម្មវិធីទី២៖ ពង្រឹងការអនុវត្តថវិកាកម្មវិធី | 1,015.4 |
| ៣.៣ អនុកម្មវិធីទី ៣ ៖ ការពង្រឹងសវនកម្មផ្ទៃក្នុង និងអធិការកិច្ច | 250.0 |
| ៣.៤ អនុកម្មវិធីទី៤ ៖ការកសាងសមត្ថភាពស្ថាប័ន និងផ្សព្វផ្សាយ | 1,100.0 |
| ៣.៥ អនុម្មវិធីទី ៥ ៖ការពង្រឹងការងាររដ្ឋបាល និងបុគ្គលិក | 310.0 |
| ៣.៦ អនុម្មវិធីទី ៦ ៖សេវាគាំទ្រគោលនយោបាយ | 15,146.7 |
| ៣.៧ អនុម្មវិធីទី ៧ ៖ការពង្រឹងសេវាគាំទ្ររដ្ឋបាល ហិរញ្ញវត្ថុ និងកសាងសមត្ថភាព របស់មន្ទីរជំនាញទាំង២៥ | 23,342.9 |

| តារាង ៧ ÷ គម្រោងចំណាយថវិកាក្រសួងសាធារណការ និងដឹកជញ្ជូន តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
| --- | --- |
| **សរុបរួម** | **366,277.9** |
| **១.កម្មវិធីទី១៖អភិវឌ្ឍន៍ ជួសជុល ថែទាំ និងគ្រប់គ្រងសំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន និងភស្តុភារកម្ម** | **272,104.8** |
| ១.១.អនុកម្មវិធីទី១៖អភិវឌ្ឍន៍ ជួសជុល ថែទាំ និងគ្រប់គ្រងសំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន ផ្លូវជាតិ-ផ្លូវខេត្ត ( ក្រុម ក ) | 233,286.5 |
| ១.២.អនុកម្មវិធីទី២៖អភិវឌ្ឍន៍ ជួសជុល ថែទាំ និងគ្រប់គ្រងសំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធផ្លូវជាតិ ផ្លូវខេត្ត និងរចនាសម្ព័ន្ធសាធារណៈ ថ្នាក់ក្រោមជាតិ និងវិស្វកម្ម ( ក្រុម ខ ) | 32,728.3 |
| ១.៣.អនុកម្មវិធីទី៣៖ស្តាបនា ជួសជុល ថែទាំ សំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន ផ្លូវជាតិ-ផ្លូវខេត្ត និងស្រាវជ្រាវបច្ចេកទេសសំណង់សាធារណការ និងហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន ( ក្រុម គ) | 4,431.0 |
| ១.៤.អនុកម្មវិធីទី៤៖ការងារគាំទ្រ និងអន្តរាគមន៍ ការស្តាបនា ជួសជុល ថែទាំ សំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន ផ្លូវជាតិ-ផ្លូវខេត្ត (ក្រុម ឃ) | 99.2 |
| ១.៥.អនុកម្មវិធីទី៥៖ការងារគាំទ្រ និងអន្តរាគមន៍ ការស្តាបនា ជួសជុល ថែទាំ សំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន ផ្លូវជាតិ-ផ្លូវខេត្ត និងគ្រប់គ្រង ថែទាំគ្រឿងចក្រសាងសង់ (ក្រុម ង) | 211.6 |
| ១.៦.អនុកម្មវិធីទី៦៖អភិវឌ្ឍន៍ ជួសជុល ថែទាំ និងគ្រប់គ្រងសំណង់សាធារណការ ហេដ្ឋារចនាសម្ព័ន្ធដឹកជញ្ជូន ផ្លូវទឹក | 1,348.2 |
| **២.កម្មវិធីទី២៖អភិវឌ្ឍន៍ ថែទាំ គ្រប់គ្រងហេដ្ឋារចនាសម្ព័ន្ធ សេវាកម្ម និងសុវត្ថិភាពផ្លូវដែក** | **202.4** |
| ២.៣.អនុកម្មវិធីទី៣៖គាំទ្ររដ្ឋបាលទូទៅ | 202.4 |
| **៣.កម្មវិធីទី៣៖ពង្រឹងការគ្រប់គ្រងចរាចរណ៍/ មធ្យោបាយ សេវាកម្ម អាជីវកម្ម ប្រព័ន្ធដឹកជញ្ជូន និងភស្តុភារកម្មគ្រប់ប្រភេទ ដោយសុវត្ថិភាពនិងប្រសិទ្ធភាព** | **3,738.3** |
| ៣.១.អនុកម្មវិធីទី១៖គ្រប់គ្រងមធ្យោបាយដឹកជញ្ជូន និងសុវត្ថិភាពចរាចរណ៍ផ្លូវគោក | 3,365.5 |
| ៣.២.អនុកម្មវិធីទី២៖គ្រប់គ្រងមធ្យោបាយដឹកជញ្ជូន និងសុវត្ថិភាពចរាចរណ៍ផ្លូវទឹក | 197.8 |
| ៣.៣.អនុកម្មវិធីទី៣៖គ្រប់គ្រងនាវាជំនួញសមុទ្រ និងសវត្ថិភាពចរាចរណ៍ផ្លូវសមុទ្រ | 175.0 |
| **៤.កម្មវិធីទី៤៖គាំទ្រគោលនយោបាយសាធារណការ, ដឹកជញ្ជូន ការអភិវឌ្ឍន៍ធនធានមនុស្ស និងគ្រប់គ្រង រដ្ឋបាលទូទៅ** | **90,232.4** |
| ៤.១.អនុកម្មវិធីទី១៖ការគ្រប់គ្រង និងអភិវឌ្ឍន៍ធនធានមនុស្ស | 30,378.9 |
| ៤.២.អនុកម្មវិធីទី២៖ពង្រឹងការងាររដ្ឋបាល | 1,424.4 |
| ៤.៣.អនុកម្មវិធីទី៣៖ការកសាងផែនការរយៈពេលវែង និងមធ្យម | 361.4 |
| ៤.៤.អនុកម្មវិធីទី៤៖ពង្រឹងការអនុវត្តន៍ថវិកាកម្មវិធី | 6,121.7 |
| ៤.៥ អនុម្មវិធីទី ៥ ៖ពង្រឹងការអនុវត្តន៍កិច្ចលទ្ធកម្ម | 152.2 |

| តារាង ៧ ÷ គម្រោងចំណាយថវិកាក្រសួងសាធារណការ និងដឹកជញ្ជូន តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
| --- | --- |
| ៤.៦.អនុកម្មវិធីទី៦៖ពង្រឹងទំនាក់ទំនងសហប្រតិបត្តិការអន្តរជាតិ | 250.8 |
| ៤.៧.អនុកម្មវិធីទី៧៖ពង្រឹងយន្តការសវនកម្មផ្ទៃក្នុង | 345.6 |
| ៤.៨.អនុកម្មវិធីទី៨៖ពង្រឹងយន្តការអធិការកិច្ច | 364.2 |
| ៤.៩.អនុកម្មវិធីទី៩៖ គ្រប់គ្រងចំណូល-ចំណាយរដ្ឋបាល និងសេវាសាធារណៈ ២៥ រាជធានី-ខេត្ត | 50,833.3 |

| តារាង ៨ ÷ គម្រោងចំណាយថវិកាក្រសួងរៀបចំដែនដី នគរូបនីយកម្ម និងសំណង់ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **សរុបរួម** | **63,829.4** |
| **១. កម្មវិធីទី ១៖ ពង្រឹងការគ្រប់គ្រងដីធ្លី** | **32,895.9** |
| ១.១.អនុកម្មវិធីទី១ ៖កសាងប្រព័ន្ធវាយតម្លៃថ្លៃអចលនទ្រព្យ និងពង្រឹងការផ្សព្វផ្សាយ និងផលិតឯកសារទាក់ទងនឹងការចុះបញ្ជីដីធ្លី | 146.5 |
| ១.២.អនុកម្មវិធីទី២ ៖ ការត្រួតពិនិត្យ និងតាមដានការអនុវត្តន៍ការងារសុរិយោដី | 256.5 |
| ១.៣.អនុកម្មវិធីទី៣ ៖ ពង្រឹង និងគាំទ្របច្ចេកទេសវាស់វែងសុរិយោដី | 2,447.7 |
| ១.៤.អនុកម្មវិធីទី៤ ៖ ការពង្រឹងការអភិរក្សសុរិយោដី | 102.0 |
| ១.៥.អនុកម្មវិធីទី៥ ៖ ការធ្វើបច្ចុប្បន្នភាពផែនទីរដ្ឋបាល និងឋានលេខាននៃកម្ពុជា | 586.0 |
| ១.៦.អនុកម្មវិធីទី ៦ ៖ ពង្រឹង និងគាំទ្របច្ចេកវិទ្យាព័ត៌មានសុរិយោដី | 138.1 |
| ១.៧.អនុកម្មវិធីទី ៧ ៖ ការដោះស្រាយទំនាស់ដីធ្លីរបស់គណៈកម្មការសុរិយោដីថ្នាក់ជាតិ | 219.1 |
| ១.៨.អនុកម្មវិធីទី៨ ៖ កម្មវិធីអនុវិស័យរដ្ឋបាលដីធ្លី | 29,000.0 |
| **២. កម្មវិធីទី ២៖ ពង្រឹងការរៀបចំដែនដី និងនិងបែងចែកដីក្នុងគោលដៅសម្បទានដីសង្គមកិច្ច** | **5,467.0** |
| ២.១.អនុកម្មវិធីទី១៖ សេវាគាំទ្រកិច្ចការទូទៅរៀបចំដែនដី និងនគរូបនីយកម្ម និងពង្រឹងការងារគាំទ្របច្ចេកទេសផែនការរៀបចំដែនដីថ្នាក់ខេត្ត និងថ្នាក់មូលដ្ឋាន | 1,300.0 |
| ២.២.អនុកម្មវិធីទី២៖ ពង្រឹងការងាររៀបចំដែនដី និងកសាងប្លង់គោលប្រើប្រាស់ដីថ្នាក់ស្រុក | 552.0 |
| ២.៣.អនុកម្មវិធីទី៣៖ ពង្រឹងការងារនគរូបនីយកម្ម និងការងារកសាងប្លង់គោល និងផែនការប្រើប្រាស់ដី ថ្នាក់ក្រុង និងទីប្រជុំជន | 560.0 |
| ២.៤.អនុកម្មវិធីទី៤៖ បែងចែកដីក្នុងគោលដៅសម្បទានដីសង្គមកិច្ច | 550.0 |
| ២.៥.អនុកម្មវិធីទី៥៖ ការពង្រឹងការកសាងនិងសម្របសម្រួលការងាររៀបចំដែនដីនិងនគរូបនីយកម្ម | 945.0 |
| ២.៦.អនុកម្មវិធីទី៦៖ ការពង្រឹងការគ្រប់គ្រងនិងអភិវឌ្ឍន៍តំបន់ឆ្នេរសមុទ្រកម្ពុជា | 1,310.0 |
| ២.៧.អនុ+កម្មវិធីទី៧៖ ជម្រុញ និងពង្រឹងកម្មវិធីអនុវិស័យរៀបចំដែនដី (ឆ្នាំ២០១៦) | 250.0 |
| **៣. កម្មវិធីទី ៣៖ ពង្រឹងការគ្រប់គ្រងវិស័យសំណង់** | **1,235.2** |
| ៣.១.អនុកម្មវិធីទី១៖ ការរៀបចំឯកសារគតិយុត្តសម្រាប់ការងារសិក្សាគម្រោងប្លង់ | 136.5 |
| ៣.២.អនុកម្មវិធីទី២៖ ការរៀបចំឯកសារគតិយុត្តសម្រាប់ការងារសំណង់ | 246.6 |
| ៣.៣.អនុកម្មវិធីទី៣៖ ការរៀបចំឯកសារគតិយុត្តសម្រាប់ការងារស្រាវជ្រាវបច្ចេកទេសសំណង់ | 683.9 |
| ៣.៤.អនុកម្មវិធីទី៤៖ ការពង្រឹងវិស័យវិជ្ជាជីវៈស្ថាបត្យកម្ម | 168.2 |

| តារាង ៨ ÷ គម្រោងចំណាយថវិកាក្រសួងរៀបចំដែនដី នគរូបនីយកម្ម និងសំណង់ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **៤. កម្មវិធីទី ៤៖ ការគាំទ្រដំណើរការរដ្ឋបាល និងអភិវឌ្ឍន៍ស្ថាប័ន** | **22,821.5** |
| ៤.១.អនុកម្មវិធីទី ១៖ការបង្កើនប្រសិទ្ធភាព និងភាពសក្តិសិទ្ធ នៃការគ្រប់គ្រងចំណូលចំណាយសាធារណៈ | 17,470.4 |
| ៤.២.អនុកម្មវិធីទី២ ៖ ការពង្រឹងគុណភាព និងប្រសិទ្ធភាពនៃការផ្តល់សេវាសាធារណៈលើវិស័យដីធ្លី និងសំណង់ | 278.9 |
| ៤.៣.អនុកម្មវិធីទី៣ ៖ ប្រសិទ្ធភាពនៃដំណើការរដ្ឋបាល និងដំណើការទូទៅ | 1,896.0 |
| ៤.៤.អនុកម្មវិធីទី៤៖ ពង្រឹងការគ្រប់គ្រងធនធានមនុស្ស | 248.5 |
| ៤.៥.អនុកម្មវិធីទី៥ ៖ ការបណ្តុះបណ្តាលវិជ្ជាជីវៈ និងការផ្សព្វផ្សាយអប់រំច្បាប់ និងគោលនយោបាយពាក់ព័ន្ធនឹងវិស័យការងាររបស់ក្រសួង | 1,132.8 |
| ៤.៦.អនុកម្មវិធីទី៦ ៖ ពង្រឹងការបញ្ជ្រាបយេនឌ័រលើវិស័យដីធ្លី | 134.0 |
| ៤.៧.អនុកម្មវិធីទី៧ ៖ ការធ្វើអធិការកិច្ច និងពង្រឹងគុណភាពនៃដំណើការរដ្ឋបាល | 383.0 |
| ៤.៨.អនុកម្មវិធីទី៨ ៖ ការអភិវឌ្ឍន៍ និងការពង្រឹងគោលនយោបាយច្បាប់ និងលិខិតបទដ្ឋានគតិយុត្តិ | 210.4 |
| ៤.៩.អនុកម្មវិធីទី៩ ៖ អភិវឌ្ឍសេដ្ឋកិច្ច កិច្ចការវិនិយោគ និងការងារស្ថិតិ | 247.3 |
| ៤.១០.អនុកម្មវិធីទី១០៖ពង្រឹងការអភិវឌ្ឍន៍សវនដ្ឋាន | 407.6 |
| ៤.១១.អនុកម្មវិធីទី១១៖ដំណើរការការងាររដ្ឋបាល ខុទ្ទកាល័យ | 205.0 |
| ៤.១៣.អនុកម្មវិធីទី១៣ ៖ ពង្រឹង និងបង្កើនការអនុវត្តកិច្ចលទ្ធកម្មសាធារណៈ | 207.6 |
| **៥. កម្មវិធីទី ៥៖ លំនៅឋាន** | **1,409.8** |
| ៥.១.អនុកម្មវិធីទី១៖ ពង្រឹងកិច្ចការបទប្បញ្ញត្តិ ផែនការ និងទំនាក់ទំនងសហប្រតិបត្តិការការងារលំនៅឋាន | 416.9 |
| ៥.២.អនុកម្មវិធីទី២៖ បទដ្ឋានបច្ចេកទេស និងគតិយុត្តលំនៅឋាន | 527.5 |
| ៥.៣.អនុកម្មវិធីទី ៣ ៖ មូលនិធិ និងឥណទានលំនៅឋាន | 465.4 |

| តារាង ៩ ÷ គម្រោងចំណាយថវិកាក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **សរុបរួម** | **502,174.6** |
| **១.កម្មវិធីទី១ : ពង្រឹងនិងបង្កើនប្រសិទ្ធភាពនៃការគ្រប់គ្រងសេដ្ឋកិច្ច** | **3,973.0** |
| ១.១.អនុកម្មវិធីទី១ : ពង្រឹងនិងបង្កើនប្រសិទ្ធភាពនៃការរៀបចំការ អភិវឌ្ឍន៍ ការវិភាគ ការព្យាករណ៍ ការតាមដាន និងការ វាយតម្លៃលើការអនុវត្តគោលនយោបាយម៉ាក្រូសេដ្ឋកិច្ច និងហិរញ្ញវត្ថុសាធារណៈ។ | 2,173.0 |
| ១.២.អនុកម្មវិធីទី២ : បង្កើនប្រសិទ្ធភាពនៃការរៀបចំអនុសាសន៍ ការវិភាគ ការព្យាករណ៍ ការតាមដាន និងការវាយតម្លៃលើការអនុវត្ត ក្របខ័ណ្ឌគោលនយោបាយ ក្របខ័ណ្ឌយុទ្ធសាស្ត្រ និងគោលនយោ បាយសេដ្ឋកិច្ចពលកម្ម ផលិតភាពពលកម្ម និងភាពប្រកួតប្រជែង។ | 600.0 |
| ១.៣.អនុកម្មវិធីទី៣ : គាំទ្រប្រមុខរាជរដ្ឋាភិបាលក្នុងការរៀបចំអនុវត្ត និងវាយតម្លៃរបៀបវារៈគោលនយោបាយ និងយុទ្ធសាស្ត្រអភិវឌ្ឍន៍សង្គម - សេដ្ឋកិច្ច។ | 1,200.0 |
| **២.កម្មវិធីទី២ : ពង្រឹងនិងបង្កើនប្រសិទ្ធភាពនៃការគ្រប់គ្រង ការត្រួតពិនិត្យ និងការអភិវឌ្ឍន៍វិស័យហិរញ្ញវត្ថុ** | **3,835.1** |
| ២.១.អនុកម្មវិធីទី១ :ពង្រឹងនិងបង្កើនសក្តិសិទ្ធភាព និងប្រសិទ្ធភាព នៃការរៀបចំ និងការអនុវត្តគោលនយោបាយ និងយុទ្ធសាស្ត្រអភិវឌ្ឍ វិស័យហិរញ្ញវត្ថុ ការគ្រប់គ្រង ការត្រួតពិនិត្យ ការអនុវត្តការតាមដាន និងការវាយតម្លៃលើការអនុវត្តក្នុងវិស័យឧស្សាហកម្មហិរញ្ញវត្ថុ។ | 1,472.0 |
| ២.២.អនុកម្មវិធីទី២ :ពង្រឹងនិងបង្កើនសក្តិសិទ្ធភាព និងប្រសិទ្ធភាព នៃការរៀបចំ និងការអនុវត្តគោលនយោបាយ និងយុទ្ធសាស្ត្រអភិវឌ្ឍក្របខ័ណ្ឌគតិយុត្ត ការគ្រប់គ្រង ការត្រួតពិនិត្យ ការដោះ ស្រាយវិវាទ ការអនុវត្ត ការតាមដាន និងការវាយតម្លៃលើការអនុវត្ត ប្រព័ន្ធគណនេយ្យ និងសវនកម្ម។ | 458.4 |
| ២.៣.អនុកម្មវិធីទី៣ :ពង្រឹងនិងបង្កើនប្រសិទ្ធភាព នៃការគ្រប់គ្រង ការត្រួតពិនិត្យ និងការអភិវឌ្ឍវិស័យមូលប័ត្រ ប្រកបដោយស្ថិរភាពនិងចីរភាព។ | 1,904.7 |
| **៣.កម្មវិធីទី៣ : ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាពនិងប្រសិទ្ធភាពនៃការគ្រប់គ្រងការគៀរគរចំណូលថវិកាជាតិ និងទ្រព្យសម្បត្តិរដ្ឋ។** | **356,019.5** |
| ៣.១.អនុកម្មវិធីទី១ : ពង្រឹងនិងបង្កើនសក្តិសិទ្ធភាព និងប្រសិទ្ធភាព នៃការអនុវត្តគោលនយោបាយ និងយុទ្ធសាស្ត្រ ការគ្រប់គ្រង ការត្រួតពិនិត្យ ការអនុវត្ត ការតាមដាន និងការវាយតម្លៃលើការអនុវត្ត នៃការប្រមូលចំណូលគយ និងរដ្ឋាករ។ | 270,814.2 |
| ៣.២.អនុកម្មវិធីទី២ : ពង្រឹងនិងបង្កើនសក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការរៀបចំ និងការអនុវត្តគោលនយោបាយ និងយុទ្ធសាស្ត្រ ក្របខ័ណ្ឌគតិយុត្ត ការគ្រប់គ្រង ការត្រួតពិនិត្យការអនុវត្ត ការតាមដាន និងការវាយតម្លៃលើការអនុវត្ត នៃការប្រមូលចំណូលពន្ធដារ។ | 77,381.6 |
| ៣.៣.អនុកម្មវិធីទី៣ : ពង្រឹងនិងបង្កើនសក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការរៀបចំ និងការអនុវត្តគោលនយោបាយ និងយុទ្ធសាស្ត្រ ក្របខ័ណ្ឌគតិយុត្ត ការគ្រប់គ្រង ការត្រួតពិនិត្យ ការអនុវត្ត ការតាមដាន និងការវាយតម្លៃលើការអនុវត្តនៃការគៀរគរចំណូលមិនមែន សារពើពន្ធ និងការគ្រប់គ្រងទ្រព្យសម្បត្តិរដ្ឋ។ | 7,823.7 |

| តារាង ៩ ÷ គម្រោងចំណាយថវិកាក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **៤.កម្មវិធីទី៤ : ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការគ្រប់គ្រងចំណាយសាធារណៈ** | **18,033.5** |
| ៤.១.អនុកម្មវិធីទី១ :ការរៀបចំថវិកាជាតិ និងការត្រួតពិនិត្យតាមដានការអនុវត្តថវិកាថ្នាក់ជាតិ។ | 10,104.0 |
| ៤.២.អនុកម្មវិធីទី២ :ពង្រឹងនិងបង្កើនសក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការរៀបចំ ការតាមដាននិងការវាយតម្លៃលើការអនុវត្តថវិការបស់រដ្ឋបាលថ្នាក់ក្រោមជាតិ។ | 1,416.0 |
| ៤.៣.អនុកម្មវិធីទី៣ :ពង្រឹងនិងបង្កើនសក្តិសិទ្ធភាព និងប្រសិទ្ធភាពតម្លាភាពនិងគណនេយ្យភាពនៃការគ្រប់គ្រងលទ្ធកម្មសាធារណៈ។ | 960.0 |
| ៤.៤.អនុកម្មវិធីទី៤៖ ពង្រឹងនិងបង្កើនប្រសិទ្ធភាព នៃការគ្រប់ គ្រងសាច់ប្រាក់ បច្ចុប្បន្នកម្មនៃប្រព័ន្ធកត់ត្រា និងការរៀបចំរបាយការណ៍ហិរញ្ញវត្ថុតាមស្តង់ដារអន្តរជាតិ។ | 5,553.5 |
| **៥.កម្មវិធីទី៥ : ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាព និងប្រសិទ្ធភាពនៃការគាំទ្រទូទៅ និងការធានាគណនេយ្យភាពក្នុងការគ្រប់គ្រងហិរញ្ញវត្ថុសាធារណៈ** | **120,313.5** |
| ៥.១.អនុកម្មវិធីទី១៖ ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាពនិងប្រសិទ្ធភាព នៃការទ្រទ្រង់កម្មវិធីកែទម្រង់ការគ្រប់គ្រងហិរញ្ញវត្ថុសាធារណៈ ឆ្ពោះទៅកាន់ស្តង់ដារអន្តរជាតិ។ | 1,663.1 |
| ៥.២.អនុកម្មវិធីទី២៖ ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាពនិងប្រសិទ្ធភាព នៃការគាំទ្រកិច្ចដំណើរការ អនុវត្តមុខងារ និងភារកិច្ចរបស់ថ្នាក់ដឹកនាំ និងអង្គភាពក្រោមឪវាទក្រសួង។ | 95,435.5 |
| ៥.៣.អនុកម្មវិធីទី៣៖ ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាពនិងប្រសិទ្ធភាព នៃការគ្រប់គ្រង ការត្រួតពិនិត្យ ការសម្របសម្រួល ការផ្សព្វផ្សាយណែនាំអនុវត្ត និងការគាំទ្រការងារវិស័យសេដ្ឋកិច្ច និងហិរញ្ញវត្ថុនៅរាជធានី ខេត្ត។ | 21,920.0 |
| ៥.៤.អនុកម្មវិធីទី៤៖ ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាពនិងប្រសិទ្ធភាពនៃការរៀបចំ និងការអនុវត្តផែនការយុទ្ធសាស្ត្រអធិការកិច្ចហិរញ្ញវត្ថុនិងការចុះធ្វើអធិការកិច្ចលើការគ្រប់គ្រងហិរញ្ញវត្ថុសាធារណៈ | 737.9 |
| ៥.៥.អនុកម្មវិធីទី៥៖ ពង្រឹងនិងបង្កើនស័ក្តិសិទ្ធភាពនិងប្រសិទ្ធភាព នៃការរៀបចំ និងការអនុវត្តគោលនយោបាយ និងយុទ្ធសាស្ត្រ អភិវឌ្ឍន៍មុខងារសវនកម្មផ្ទៃក្នុង ក្របខ័ណ្ឌស្តង់ដារសវនកម្មផ្ទៃក្នុង និងធ្វើសវនកម្មលើស័ក្តិសិទ្ធភាព និងប្រសិទ្ធភាព នៃដំណើរការប្រព័ន្ធគ្រប់គ្រងផ្ទៃក្នុង។ | 557.0 |

| តារាង ១០ ÷ គម្រោងចំណាយថវិកាក្រសួងយុត្តិធម៌ តាមកម្មវិធី-អនុកម្មវិធី | ២០១៦ |
|---|---|
| **សរុបរួម** | **94,239.3** |
| **១.កម្មវិធីទី១៖ កិច្ចការច្បាប់** | **7,251.1** |
| ១.១.អនុកម្មវិធីទី១៖ សេវាអយ្យការ និងព្រហ្មទណ្ឌ | 1,166.1 |
| ១.២.អនុកម្មវិធីទី២៖ សេវារដ្ឋប្បវេណី | 3,730.4 |
| ១.៣.អនុកម្មវិធីទី៣៖ សេវាអភិវឌ្ឍន៍លើវិស័យយុត្តិធម៌ | 2,354.6 |
| **២.កម្មវិធីទី២៖ កិច្ចការតុលាការ** | **65,296.9** |
| ២.១.អនុកម្មវិធីទី១៖ សេវារដ្ឋបាលតុលាការ | 854.4 |
| ២.២.អនុកម្មវិធីទី២៖ សេវាផ្តល់វិជ្ជាជីវៈពាក់ព័ន្ធតុលាការ | 4,089.0 |
| ២.៣.អនុកម្មវិធីទី៣៖ សេវាសាលាដំបូងរាជធានី-ខេត្ត | 44,287.1 |
| ២.៤.អនុកម្មវិធីទី៤៖ កិច្ចការឯករាជ្យភាពចៅក្រម | 4,539.6 |
| ២.៥.អនុកម្មវិធីទី៥៖ សេវាសាលាឧទ្ធរណ៍ និងមហាអយ្យការអមសាលាឧទ្ធរណ៍ | 6,180.2 |
| ២.៦.អនុកម្មវិធីទី៦៖ សេវាតុលាការកំពូល និងមហាអយ្យការអមតុលាការកំពូល | 5,346.6 |
| **៣.កម្មវិធីទី៣៖ សេវាគាំទ្រទូទៅ** | **21,691.3** |
| ៣.១.អនុកម្មវិធីទី១៖ សេវាកិច្ចការបុគ្គលិក និងរដ្ឋបាលទូទៅ | 19,745.6 |
| ៣.២.អនុកម្មវិធីទី២៖ សេវាពង្រឹងការគ្រប់គ្រង និងដំណើរការ | 1,945.7 |